# ខ្មែរប៉ុស្តិ៍
# The Khmer Post
ISSUE 33 27th March-12th April 2009




## ភ្នំពេញ : កែ គឹមយ៉ាន តំណែងផ្សះផ្សាផ្ទៃក្នុងបក្ស ឬជាសម្ពាធនយោបាយពីយួន ?

អតីតនាយឧត្តមសេនីយ៍ កែ គឹមយ៉ាន

**ភ្នំពេញ, ខ្មែរប៉ុស្តិ៍ : ចាន់ កុសល**

លោកអតីតនាយឧត្តមសេនីយ៍ កែ គឹមយ៉ាន អគ្គមេបញ្ជាការកងយោធពលខេមរភូមិន្ទ ដែលត្រូវបានបណ្តេញចេញពីមុខតំណែងក្រោមលេសថា (តទៅទំព័រទី១៦)

## ខ្មែរ Long Beach គ្មានទូរទស្សន៍មើលក្នុងតំបន់របស់ខ្លួន

**ឡុងប៊ិច, ខ្មែរប៉ុស្តិ៍ : វ៉ាន់ាថ**

នៅ Long Beach បានបាត់បង់ការ តាមប៉ុន្មានឆ្នាំចុងក្រោយនេះ សហគមន៍ខ្មែរ ដានស្ថានការណ៍ ( តទៅទំព័រទី០៦ )

## ឡុងប៊ិច : ប៉ូលិសដាក់បំរាមក្រុម ទិត ស៊ីជាន់ កុំឱ្យប៉ះពាល់ទ្រព្យសម្បត្តិវត្ត IRAP

**ឡុងប៊ិច, ខ្មែរប៉ុស្តិ៍ : វ៉ាន់ាថ**

•••ក្រុមប៉ូលិសក្រុង Long Beach បានដាក់បំរាមមួយដល់ក្រុមលោក ( តទៅទំព័រទី១៥ )

## ហ្វីឡាដែលហ្វៀយ៉ា: ក្រសួងអប់រំ មានគម្រោងក្នុងឆ្នាំ២០១៤

**ខ្មែរប៉ុស្តិ៍**

•ស្គូលឌីស្រ្ទីក (SCHOOL DISTRICT) នៅ ហ្វីឡាដែលហ្វៀ កំពុងធ្វើការឃោសនាយ៉ាងសកម្មមួយ ស្តីអំពីកម្មវិធីអប់រំក្នុងតំបន់ឱ្យបានប្រសើរសម្រាប់ឆ្នាំ ២០១៤។ តែសហគមន៍ខ្មែរ- ឡាវប្រមាណ ១០០ នាក់ មកចូលរួមប្រជុំថ្ងៃទី ១៩ មីនានេះ នៅវិទ្យាល័យហ្វីឡាដែលហ្វីយ៉ា ខាងត្បូង នាំគ្នាទាមទារឱ្យអំណាចអប់រំរដ្ឋដាក់បញ្ចូលនូវសំណើរមួយចំនួនរបស់គ្រួសារខ្មែរ ( តទៅទំព័រទី១៥ )



# ឆាល សុង ជាវីរបុរសកាកបាទក្រហម

ក្រុងខ្មែរ, ខ្មែរប៉ុស្តិ៍ : វ៉ាន់នាថ

●●● "ផ្ទាំងរូបថតខ្ញុំមួយយ៉ាងធំនៅទំព័រមុខកាសែតបរទេស គឺ Press-Telegram បានរុញច្រានទឹកភ្នែករបស់ខ្ញុំឱ្យហូរស្រក់ដោយមិនដឹងខ្លួនទាំងក្តីរំភើបនៅពេលឃើញរូបភាពខ្ញុំដែលកំពុងតែទទួលនូវបណ្ណោងលើកទឹកចិត្ត និងការសម្រេចពីអង្គការកាកបាទក្រហមអាមេរិកាំង (A.R.C) ប្រចាំទីក្រុង Long Beach ដែលផ្តល់កិត្តិយសជាវីរជនជួយសង្គ្រោះជីវិតមនុស្សប្រចាំឆ្នាំ2009 ខ្ញុំមិននឹកស្មានដល់ថា មានសំណាងយ៉ាងដូច្នេះនៅថ្ងៃនេះ ។

អ្វីដែលខ្ញុំបានធ្វើសំរាប់ជាលក្ខណៈគ្រួសាររបស់ខ្ញុំ ស្រាប់តែវាបានប្រែក្លាយជាគំរូនៃមនុស្សល្អម្នាក់នៅក្នុងសង្គមអាមេរិកាំង ដែលបានលើកតម្កើងតម្លៃមនុស្ស និងកាន់តែធ្វើឱ្យរូបខ្ញុំបន្តបរិច្ចាគពេលវេលាជាមួយសង្គមដើម្បីធ្វើ ឬជួយដល់គ្នានូវសេចក្តីល្អការសង្គ្រោះគ្នាឱ្យផុតពីទុក្ខសោកនៃគ្រោះមហន្តរាយរបស់មនុស្ស សត្វ ដែលនេះជាមោទនភាព និងក្តីរំភើបរបស់ខ្ញុំ ហើយក៏ជាការផ្តល់នូវកិត្តយសមួយសំរាប់សហគមន៍ខ្មែរយើងផងដែរ" ។ នេះជាសំដីលោក ឆាល សុង បាននិយាយប្រាប់កាសែតខ្មែរប៉ុស្តិ៍ ។


វីរបុរស ឆាល សុង (រូបថតខ្មែរប៉ុស្តិ៍)

នៅក្នុងពិធីជាប្រចាំឆ្នាំរបស់កាកបាទក្រហមអាមេរិកក្នុងការជ្រើសរើសអ្នកដែលបានជួយសង្គ្រោះជីវិតមនុស្សកាលពីថ្ងៃទី10 មីនា ឆ្នាំ 2009 ។ វីរបុរស23រូបចម្រុះជាតិសាសន៍បានត្រូវផ្តល់ជាកិត្តយសនូវបន្ទោងខ្សែកស្លាក និងលិខិតសរសើរនៃតម្លៃជាអ្នកជួយសង្គ្រោះជីវិតមនុស្សពីសំណាក់សមាជិកព្រឹទ្ធសភា រដ្ឋសភា និងអាជ្ញាធរប្រចាំតំបន់ California ភាគខាងត្បូង ។

នេះជាពិធីលើកទឹកចិត្ត និងឱ្យតម្លៃមនុស្សដែលបានជួយជីវិតអ្នកដទៃជាលើកទី5មក ហើយដែលកាកបាទក្រហមអាមេរិកក្រុង Long Beach បានរៀបចំធ្វើឡើង ។

( តទៅទំព័រទី២០ )




# ក្លឹបសារព័ត៌មានខ្មែរ

**ដោយ : ពិន សំខុន**

●●●គំនិតនៃក្លឹបសារព័ត៌មានខ្មែរ បានចាប់កំណើតនៅទីក្រុងហ្វីឡាដែលហ្វីយ៉ា កាលពីបីខែមុនជាមួយនឹង ដំណើរការណ៍ប្រកបដោយភាពជោគជ័យរបស់កាសែតខ្មែរប៉ុស្តិ៍ឆ្នេរខាងកើតនៃសហរដ្ឋអាមេរិក ។

ថ្ងៃអាទិត្យ ទី២៩ មីនា ខាងមុខ វេលាម៉ោង 11:30ព្រឹក នៅភោជនីយដ្ឋាន THE GOLEN PALACE ក្លឹបខ្មែរនឹងទទួលសាធារណជនជាលើកទី៣ ដើម្បីចែករំលែកព័ត៌មានថ្មីៗ ពិគ្រោះយោបល់ស្វែងរកពីព្រឹត្តការណ៍សង្គមដែលចងភ្ជាប់ជីវភាពប្រចាំថ្ងៃ ទទួលយកនូវគំនិតថ្មីៗ និងប្លែកៗដែលអាចជារង្វាន់ដល់ជីវិតសេដ្ឋកិច្ច ដែលកំពុងតែតានតឹងឡើងជារាល់ថ្ងៃក៏សឹងមាន ។

កាសែតខ្មែរប៉ុស្តិ៍មានមោទនភាព និងទទួលជាអ្នករៀបចំបដិសណ្ឋារកិច្ច ដោយសារលោកអ្នកអានកាន់តែច្រើនបានវាយតម្លៃចរន្ត និងគុណភាពព័ត៌មានបានខ្ពស់សមរម្យ និងទទួលភារកិច្ចដ៏លំបាកជាអ្នកទ្រទ្រង់ស្មារតីនៃ "ក្លឹបព័ត៌មានខ្មែរ " ហ៊ានលើកយកប្រស្នា និងបញ្ហាធំៗរបស់សង្គមមកលាតត្រដាង ដើម្បីទាមទារការដោះស្រាយ ។ នៅពីរលើកកន្លងមកហើយ នាចុងខែនីមួយៗ យើងបានឃើញបរិយាកាសប្លែកមួយចំនួន ដូចជា វាគ្មិន នៃក្លឹបសារព័ត៌មានចំនួនពី៣០ ទៅ ៥០ រូប មានពាក់កណ្តាល សុទ្ធសឹងជាអ្នកដែលមានបទ ពិសោធន៍ក្នុងការដឹកនាំសង្គម រីឯពាក់កណ្តាលទៀត ជាពាណិជ្ជករ ឬកម្មករ និយោជិកដែលហ៊ានសំដែងមតិយោបល់បង្ហាញភស្តុតាងពីករណីជាក់ស្តែង នៃវិបត្តិសង្គម ហើយជាពិសេសទាំងអស់គ្នាបានត្រៀមខ្លួនក្នុងចលនាមនុស្សដែលត្រូវយកអាសារគ្នាយ៉ាងចំហរដើម្បីបុព្វហេតុអភិវឌ្ឍន៍ ។

ខ្មែរប៉ុស្តិ៍គ្មានអាគារទំនើបនៃ " Press Club" ធម្មតាដូចសហគមន៍ទំនើបក៏មែនពិត ក៏ប៉ុន្តែនៅចន្លោះម៉ោង ១១:៣០ និងម៉ោង ២:០០ រសៀល វាគ្មិនខ្មែរ និងបរទេសបានចូលពិសារភោជនាហារជុំគ្នាក្នុងបរិយាកាសយ៉ាងសាមញ្ញមួយ ហើយបញ្ចេញយោបល់លើកតំកើងទស្សនៈដែលបានគិតហ្មត់ចត់មកចែកជូនអ្នកស្តាប់ដែលស្រេកឃ្លាន គំនិតថ្មីល្អៗសមរម្យរហូតដល់ខ្លះនិយាយថា អាចប្តូរទស្សនៈសង្គមខ្មែរបានទៀតផង ។ ក្នុងរយៈពេលពីរម៉ោងកន្លះ នាថ្ងៃ អាទិត្យទី២៩ មីនាខាងមុននោះ យើងបានដឹងថា នឹងមានការលើកយកវិបត្តិដ៏ធ្ងន់ធ្ងរនៃសេដ្ឋកិច្ចអាមេរិកាំងដែលបានផ្តល់ផលវិបាកដល់ខ្មែរអ្នករកការធ្វើដល់ខ្មែរអ្នកប្រកបមុខរបរលក់ដូរដល់ខ្មែរដែលរំពឹងទៅលើតែជំនួយរដ្ឋដល់យុវជន និងកុមារតូចៗ មកលាតត្រដាង ដើម្បីរកវិធីមកជួយសង្គ្រោះគ្នាទៅវិញទៅមក ។ ឱកាសដ៏សាមញ្ញដែលបានកើតឡើងក្នុងរយៈពេលពីរម៉ោងនឹងធ្វើឱ្យមនុស្សខ្មែរ ដែលគ្មានបក្សគ្មានវណ្ណៈ និងគ្មានឋានន្តរស័ក្តិពិគ្រោះគ្នាទៅតាមព័ត៌មានដែលម្នាក់ៗមានដោយស្មើមុន និងដោយមេត្រីភាព ហើយសំខាន់ទៅទៀត ទាំងអស់គ្នាបានដឹងថាគំនិតរបស់វាគ្មិនម្នាក់ៗសុទ្ធសឹងប្រកបដោយតម្លៃខ្ពស់ និងបានឮជ្រួតជ្រាបទៅដល់ទីចុងកាត់មាត់ញកបាន ពីព្រោះខ្មែរប៉ុស្តិ៍នឹងផ្សព្វផ្សាយព្រឹត្តការណ៍ "ក្លឹបសារព័ត៌មាន" យ៉ាងល្អិតល្អន់នៅលើទំព័រ នៃលេខបន្ទាប់របស់ខ្លួន នៅហ្វីឡានៅពេញសហរដ្ឋអាមេរិក និងនៅអឺរ៉ុបទៀតផង។

គ្មានរូបកាយជាអចិន្ត្រៃយ៍ ? ព្រលឹងនៃ "ក្លឹប សារព័ត៌មានខ្មែរ" បានកើតឡើងជាប្រាកដក្នុងមួយខែម្តងតាមរយៈព័ត៌មានដែលលោកអ្នកទទួលគួរឱ្យយកជាការណ៍បាន ហើយយកមកប្រើប្រាស់រួមគ្នាជាប្រយោជន៍ នាចុងខែនីមួយៗនោះ "ក្លឹបសារព័ត៌មាន" បានចូលរួមនិងបង្រួបផ្នែកដែលខ្វះខាតដ៏សំខាន់មួយយ៉ាងសកម្មក្នុងការបង្កើនថាមពលគ្រួសារខ្មែរឡើងវិញ ផ្តល់លទ្ធភាពឱ្យអ្នកដែលមានសមត្ថភាពដឹកនាំបង្កើនការបង្ហាញស្នាដៃរបស់ខ្លួនឱ្យពាណិជ្ជករពង្រីកនូវសមត្ថភាពលក់ដូរទំនិញបានច្រើន... ជាមួយនឹងស្ថាប័នខ្មែរឯទៀតៗ ដែលកំពុងតែបំរើពលរដ្ឋរបស់ខ្លួន ។

យើងបានកើតឡើងក្នុងគំរូ និងទស្សនៈនៃ "ព័ត៌មានសេរីសាកលលោក" ដែលបានជួយបង្កើនចំណេះ និងទេពកោសល្យមនុស្សជាច្រើនសតវត្សមកហើយ ។ ប្រសិនបើនៅមាតុប្រទេសរបស់យើងគេពុំបាននឹកនាដល់ខ្មែរនៅហ្វីឡាដែលហ្វីយ៉ាប្រាកដជាមានសំណាងជាងជាមិនខានដោយយើងធ្លាប់តែឃើញសហគមន៍ខ្មែរបាននាំគ្នារួបរួមក្នុងសកម្មភាពសាសនា ឬនយោបាយតែឥឡូវនេះ បន្ថែមនូវសកម្មភាពគ្រួសារសកម្មភាពសេដ្ឋកិច្ច និងសង្គមកិច្ចចំនួនច្រើនគួរឱ្យចាប់អារម្មណ៍ពេកណាស់ ។ល ។ នេះជាសញ្ញាដំបូងនៃកាប្រែប្រួលទស្សនៈក្នុងសហគមន៍ខ្មែរនោះហើយ ។

ចរន្តព័ត៌មានធំៗពីរកំពុងទាក់ទាញអារម្មណ៍សហគមន៍ខ្មែរនាពេលនេះ ដែលគេសង្ឃឹមថានឹងបានទទួលការបកស្រាយ នាឱកាស " ក្លឹបសារព័ត៌មានថ្ងៃទី២៩ មីនា ខាងមុខនេះ : **១-** វិបត្តិសហរដ្ឋអាមេរិក ត្រូវបានពាណិជ្ជករ ផ្លូវលេខ៧ ខាងត្បូងហ្វីឡា និយាយថា ធ្វើឱ្យកម្មករខ្មែរបាត់បង់ការងារ និងប្រាក់ចំណូលចំនួនប្រមាណ ៥០%ដែរ ម្លោះហើយពាណិជ្ជកម្មរបស់ខ្លួន ក៏លក់បានតិចជាងមុនគួរឱ្យបារម្ភ តើធ្វើយ៉ាងណាឱ្យការលក់ដូររបស់ខ្លួន អាចទប់ទល់វិបត្តិនោះបាន ។

**២-**ពេញមួយខែមីនានេះ ក្រសួងអប់រំនៅហ្វីឡាដែលហ្វីយ៉ាគេកំពុងឃោសនាពីគម្រោងដ៏អស្ចារ្យមួយសម្រាប់ឆ្នាំ២០១៤ គឺការផ្តល់ជោគជ័យឱ្យការសិក្សារបស់កុមារ និងយុវជនដែលស្ថិតិ នាឆ្នាំកន្លងទៅនេះ និយាយថា បានបោះបង់វិទ្យាល័យចំនួន៤៥% រីឯស្ថិតិខាងគ្រួសារខ្មែរវិញ នៅតែខ្ពស់ជាង៦០%ដដែល ។ តើគ្រួសារខ្មែរទាមទារអ្វីខ្លះទៀត ដើម្បីបន្ថយចំនួនកូនក្មេងខ្មែរបោះបង់សាលារៀនបាន ។

"ក្លឹបសារព័ត៌មាន " ជាយន្តការមួយនៃលទ្ធិប្រជាធិបតេយ្យនៃទំនាក់ទំនងស្មើភាព និងដោយសេរី ទោះជាពុំមែនផ្លូវការណ៍ក៏ដោយស្ថាប័ននេះ មានប្រយោជន៍សម្រាប់សហគមន៍ដែលចេះប្រើវា ដូច្នេះសូមជួយគាំទ្រការពារ និងកែលំអឱ្យអាចរស់រានមានជីវិតបានយូរអង្វែង ៕

ទស្សនៈ អ្នកនិពន្ធ

# អានព័ត៌មានជាការស្រេកឃ្លានខាងប្រាជ្ញា

**ដោយ : ម៉ម យិន**

**❖តើសារព័ត៌មានជាអ្វី ?**

សង្គមមនុស្ស បានរិះរកគ្រប់វិធី និងមធ្យោបាយ ដើម្បីទំនាក់ទំនងគ្នាឱ្យមានចំណងមិត្តភាព និងស្រឡាញ់រាប់អានគ្នាតាមមធ្យោបាយបញ្ជូនទូវដំណឹង និងព័ត៌មានផ្សេងៗ ដើម្បីផ្សាយចែកចាយចំណេះវិជ្ជាដល់គ្នាទៅវិញទៅមក តាមរយៈសារព័ត៌មាន ។

សារព័ត៌មាន មានពាក្យ២ គឺ សារៈ និងព័ត៌មាន **សារៈ**មានន័យថា សំខាន់ ល្អប្រពៃ វិសេសវិសាល អាចផ្តល់អត្ថប្រយោជន៍ និងជួយទ្រទ្រង់ ការពារឱ្យមានសេចក្តីសុខសាន្ត ។ **ព័ត៌មាន** គឺជាដំណឹងកើតចេញមកពីសកម្មភាពនៃការប្រព្រឹត្តហេតុការណ៍ផ្សេងៗ ដែលកើតចេញពីសភាវធម្មជាតិ ឬអំពីមនុស្សដែលត្រូវការឱ្យបានផលប្រយោជន៍អ្វីមួយទៅតាមចេតនា និងសេចក្តីប៉ងប្រាថ្នាចង់បានរបស់ខ្លួន ក្នុងន័យជាវិជ្ជមាន ឬអវិជ្ជមាន ជាល្អ ឬជាអាក្រក់ ។ សកម្មភាពនេះ ត្រូវតែបញ្ជូនចេញផ្សព្វផ្សាយទៅឱ្យបានដឹងគ្រប់ទីកន្លែង ដែលគេឱ្យឈ្មោះថា សារព័ត៌មាន គឺជាដំណឹងសំខាន់ណាស់ មានអត្ថប្រយោជន៍ណាស់ មនុស្សទូទៅត្រូវតែចង់ដឹង ។ សារព័ត៌មាន គឺជាមធ្យោបាយសំខាន់វិសេសមួយ ក្នុងចំណោមមធ្យោបាយដែលមនុស្សប្រើនៅក្នុងការផ្សព្វផ្សាយឃោសនា ក្នុងគោលបំណងចង់ឱ្យមនុស្សបានទទួលការសិក្សាចំណេះវិជ្ជា ការយល់ដឹងពីកិច្ចការប្រកបមុខរបររកស៊ី ការស្វែងរកការងារធ្វើ ការពង្រីងពង្រីកនូវគម្រោងផែនការក្នុងសង្គមជាតិ តាមសេចក្តីត្រូវការជាចាំបាច់ជាពិសេស ម្យ៉ាងទៀតនៅក្នុងកិច្ចការនយោបាយ ដែលប្រទេសត្រូវការឱ្យមាន




ការរីកចំរើន លូតលាស់នៅក្នុងគ្រប់វិស័យ ។

សារព័ត៌មាន គឺជាកម្រងនៃព័ត៌មានសំខាន់ៗ ជាលាយលក្ខណ៍អក្សរ ប្រៀបដូចជាសៀវភៅធំមួយ កត់ត្រាទុកនូវរឿងរ៉ាវ ហេតុការណ៍ ព្រឹត្តការណ៍ទាំងធំទាំងតូច ដែលកើតចេញមកពាសពេញផែនដី ហើយនិងជាចំណីអាហារដ៏សំខាន់មួយសំរាប់ទ្រទ្រង់សតិអារម្មណ៍ នៅពេលណាចង់ចេះចង់ដឹងហេតុការណ៍អ្វីមួយ ដែលនាំឱ្យមនុស្សសប្បាយរីករាយ និងពោរពេញទៅដោយសេចក្តីសង្ឃឹមនៅក្នុងជីវិតរបស់ខ្លួន ។

ន័យម្យ៉ាងទៀត សារព័ត៌មាន ជាកល្យាណមិត្តដ៏ស្មោះត្រង់បំផុតម្នាក់ ដែលជាទីស្រឡាញ់រាប់អានក្នុងការនិយាយប្រាប់រឿងពិត ហើយ




មានអត្ថប្រយោជន៍យ៉ាងខ្លាំងដល់ជីវិត ។

**គោលបំណងរបស់សារព័ត៌មាន :**

ឃើញថា សារព័ត៌មាន មានគោលបំណង : ទី១- ផ្សព្វផ្សាយចែកចាយនូវព័ត៌មាន និងដំណឹងផ្សេងៗ ដែលកើតចេញមកពីធម្មជាតិ និងពីមនុស្ស ដូចជាមហន្តរាយនៃរញ្ជួយផែនដី នៃខ្យល់ព្យុះសង្ឃរាកំបុតត្បូងនៃភ្នំភ្លើង ។ល។ និងពីសង្គ្រាមប្រយុទ្ធគ្នា កាប់សម្លាប់គ្នា ដែលបណ្តាលឱ្យមនុស្សត្រូវរងទុក្ខវេទនាមហាខ្លោចផ្សា ដោយសារតែអំពើសាហាវឃោឃៅ និងអយុត្តិធម៌ ដែលមនុស្សមានអំណាច ធ្វើមកលើមនុស្សសាម័ញ្ញ ដោយគ្មានត្រាប្រណី ទោះបីជាសង្គ្រាមនោះជាប្រភេទណាក៏ដោយ ។

ទី២- ផ្សព្វផ្សាយចែកចាយនូវចំណេះវិជ្ជាគ្រប់បែបយ៉ាង ដែលចាត់ទុកជាចំណីអាហារសំខាន់សំរាប់ទ្រទ្រង់សតិអារម្មណ៍ និងសតិបញ្ញា ធ្វើឱ្យមនុស្សបានទទួលចំណេះដឹង អាចកែច្នៃជីវិតប្រចាំថ្ងៃរបស់ខ្លួនបានប្រកបដោយសុភមង្គលសុខសាន្តនៅគ្រួសារ និងសង្គមជាតិ មានកិត្តិយសកិត្តិនាមជាពលរដ្ឋថ្លៃថ្នូ និងថ្កុំថ្កើងរុងរឿង ។

ទី៣- ចង់ធ្វើជាអ្នកនាំសារ ពាំនាំពាក្យ ដែលសរសេរចេញ មានបញ្ជាក់ដោយរូបភាពនូវរឿងរ៉ាវពិតប្រាកដ ដោយស្នាដៃអ្នកនិពន្ធដ៏មានឧត្តមគិតខ្ពស់ មានសតិបញ្ញា មានសតិសម្បជញ្ញៈ មានវិចារណញ្ញាណ និងមានគតិសុចរិតទៀងត្រង់យុត្តិធម៌ ដើម្បីជួយផ្តល់នូវគ្រប់កង្វះខាតដែលមនុស្សនានា ត្រូវការជាចាំបាច់ក្នុងជីវិត ។

ទី៤- ចង់ធ្វើជាភ្នាក់ងារពិសេស មានទំនាក់

(តទៅទំព័រទី០៥)

(តមកទៅទំព័រទី០៤) **អានព័ត៌មានជាការស្រែកឃ្លាន...**

ទំនងដោយផ្ទាល់ជាមួយសាធារណជនគ្រប់ស្រទាប់វណ្ណៈ ឱ្យបានចងសម្ព័ន្ធមេត្រី រាប់អានគ្នា ស្រឡាញ់គ្នា សាមគ្គីគ្នា ជួយសង្គ្រោះ បំរើ ការពារគ្នា ក្នុងភាតរភាព សមភាព សុចរិតទៀងត្រង់ជារៀងរហូត ។

ទី៥- ចង់បាន និងចង់ឃើញការអភិវឌ្ឍន៍រីកចំរើន លូតលាស់នៅក្នុងគ្រប់កិច្ចការ ប្រកបមុខរបររកស៊ី ប្រកបការងារ ប្រកបការសិក្សារៀនសូត្រ និងការកែប្រែទម្រង់ខាងផ្លូវចិត្ត គំនិតនៃមនុស្ស ដែលធ្លាប់ប្រព្រឹត្តមិនគប្បីឱ្យមកចាប់យកចិត្តគំនិតដ៏ល្អប្រសើរវិញ សមស្របទៅតាមការប្រៀនប្រដៅរបស់អ្នកប្រាជ្ញបណ្ឌិត ។

**អត្ថប្រយោជន៍សារព័ត៌មាន :**

ក្រុមប្រឹក្សាភិបាលទាំងអស់គ្នា ដែលបានរួមដៃ រួមចិត្តបង្កើតសារព័ត៌មាននេះឡើង ដោយសារតែបានធ្វើការសិក្សាស្រាវជ្រាវ ពិចារណាយ៉ាងល្អិតល្អន់ ដើម្បីធ្វើការប្រៀបធៀបរវាងមនុស្សមានប្រាជ្ញា និងមនុស្សល្ងង់ខ្លៅ មនុស្សអ្នកមាន និងមនុស្សក្រីក្រ មនុស្សមានអំណាច និងមនុស្សអន់ខ្សោយជាដើម ។

សុភាសិតខ្មែរពោលថា " អ្នកមានរក្សាខ្សត់ ដូចសំពត់ព័ទ្ធពីក្រៅ អ្នកប្រាជ្ញរក្សាខ្លៅ ដូចសំពៅពីងសំប៉ាន " ។

សុភាសិតនេះ មានអត្ថន័យ និងខ្លឹមសារខ្លាំងណាស់សំរាប់មនុស្សចង់ចេះចង់ដឹង ហើយយកមកអនុវត្តន៍ជាប្រយោជន៍ដល់ជីវិត ។

នៅក្នុងប្រទេស និងសង្គមជាតិណា ដែលបានមើលឃើញ ហើយចាប់យកសារព័ត៌មានមកប្រើប្រាស់ជាមធ្យោបាយសំរាប់ជួយផ្តល់ចំណេះវិជ្ជានៅក្នុងគ្រប់វិស័យ ប្រទេសជាតិនោះ ត្រូវការជាចាំបាច់ឱ្យបានប្រាស់ចាកពីអំពើអគតិទាំងបួន គឺ ឆន្ទាគតិ ទោសាគតិ មោហាគតិ និងភយាគតិ ពេលនោះ សេចក្តីសុខសាន្តចំរើនរុងរឿងគ្រប់វិស័យនឹងកើតមានជាពិតប្រាកដ ។ មិនតែប៉ុណ្ណោះ អ្វីដែលឱ្យសាធារណជនគ្រប់មជ្ឈដ្ឋាន មានចិត្តសប្បាយរីករាយ ចេះស្រឡាញ់គ្នា ចេះជួយគ្នា រួបរួមគ្នា ទឹកចិត្តស្មោះត្រង់រវាងគ្នានិង គ្នា ។

**ទឹកចិត្តអ្នកបង្កើត និងអ្នកនិពន្ធសារព័ត៌មាន**

តាមការពិតអ្នកបង្កើត និងអ្នកនិពន្ធសរសេរសារព័ត៌មាន គឺជាមនុស្សប្រើឧត្តមគតិ សតិសម្បជញ្ញៈ វិចារណញ្ញាណ និងឆន្ទៈអង់អាចក្លាហានដ៏បរិសុទ្ធពិតប្រាកដ បានសម្រេចចិត្ត បេ្តជ្ញាបំភ្លេចផលប្រយោជន៍ផ្ទាល់ខ្លួន ទៅបំរើផលប្រយោជន៍រួមនៅក្នុងសង្គមទូទៅវិញ ។

តាមធម្មតា អ្នកសារព័ត៌មានរមែងជាទីស្អប់ខ្ពើមណាស់នៃក្រុមមនុស្សទុច្ចរិត ចិត្តពាលសាមាន្យ អយុត្តិធម៌ អមនុស្សធម៌ ពីព្រោះអ្នកសារព័ត៌មានត្រូវការរឿងរ៉ាវដែលកើតឡើងក្នុងផ្លូវអាក្រក់ជាជាងក្នុងផ្លូវល្អ ដោយហេតុមានបំណងចង់កែប្រែ ផ្លាស់ប្តូរ លំអការអាក្រក់នោះឱ្យមកខាងផ្លូវល្អប្រពៃវិញ ។

ទោះបីជាមានការស្អប់ខ្ពើម រហូតដល់មានគ្រោះថ្នាក់យ៉ាងធំដល់ខ្លួនយ៉ាងណាក៏ដោយ អ្នកសារព័ត៌មាន ដាច់ខាតមិនអាចភ័យតក់ស្លុតនៅចំពោះមុខក្រុមមនុស្សទុច្ចរិតនោះបានទេ ។

**ទឹកចិត្តអ្នកអានសារព័ត៌មាន :**

គឺជាមនុស្សដែលមានសណ្តានចិត្តប្រកបដោយសតិបញ្ញា និងសុទិដ្ឋិនិយម ត្រូវតែពេញចិត្ត ចូលចិត្តអានសារព័ត៌មានច្រើនជាងស្តាប់វិទ្យុ ឬមើលទូរទស្សន៍ ពីព្រោះចេញផ្សាយជាលាយលក្ខណ៍អក្សរ បានតំកល់ទុកជាឯកសាររឿងរហូត ងាយស្រួលក្នុងការដកស្រង់ចេញមកវិញ ។

ការអានសារព័ត៌មាន គឺជាការសិក្សាខាងអក្សរសាស្ត្រ វប្បធម៌ អរិយធម៌ និងគោលការណ៍តម្រាច្បាប់ក្បួនគ្រប់វិស័យ ដែលមនុស្សត្រូវការជាចាំបាច់ ចង់ចេះចង់ដឹង និងដឹកនាំជីវិតខ្លួនឱ្យស្ថិតក្នុងផ្លូវល្អប្រពៃ សមរម្យជាពលរដ្ឋដែលមានកិត្តិយលថ្លៃថ្នូ ថ្កើងរុងរឿងពេញលក្ខណៈ ។

អ្នកចូលចិត្តអានសារព័ត៌មាន គឺជាអ្នកខិតខំស្វះស្វែងរករឿងពិត សំរាប់ជួយជីវិតឱ្យបានរស់រាននៅក្នុងសង្គមជាតិ បានល្អប្រសើរ នៅក្នុងគតិយុត្តិធម៌ និងសុខសន្តិភាព ។

**ពាក្យពេចន៍អ្នកប្រាជ្ញបណ្ឌិត :**

អ្វីៗទាំងអស់សុទ្ធតែមានគូពីរ ហើយផ្ទុយគ្នា សំរាប់មនុស្សមានប្រាជ្ញា របស់ណាមានគូ តែពីរនេះវាល្អ វិសេសជាជាងអ្វី ដែលមានច្រើនជាងពីរ ដូចមានឧទាហរណ៍ខ្លះ : មនុស្ស និងសត្វ ព្រះអាទិត្យ និងព្រះច័ន្ទ ថ្ងៃ និងយប់ ប្រុស និងស្រី ចាស់ និងក្មេង កើត និងស្លាប់ ប្រាជ្ញ និងល្ងិល្ងើ គាំទ្រ និងប្រឆាំង ទុកនៅ និងផ្លាស់ប្តូរចេញ ។ល។

សប្បាយហើយអស់អ្នកណាដែលរកបានប្រាជ្ញា ហើយអ្នកនោះដែលខំប្រឹងទាល់តែបានយោបល់ ដ្បិតការដែលបាននោះវិសេសជាងប្រាក់ទៅទៀត ហើយកំរៃអំពីនោះមកក៏ប្រសើរជាងមាសសុទ្ធផង ។ ប្រាជ្ញានោះមានតម្លៃជាងត្បូងទទឹម ឥតមានរបស់ណាដែលចិត្តមនុស្សប្រាថ្នាចង់បាន ដែលនឹងយកទៅផ្ទឹមឱ្យស្មើបានឡើយ ។ មានអាយុវែងនៅដៃស្តាំ ព្រមទាំងទ្រព្យសម្បត្តិ និងកិត្តិយសនៅដៃឆ្វេងនៃប្រាជ្ញនោះ អស់ទាំងផ្លូវរបស់ប្រាជ្ញា សុទ្ធតែជាផ្លូវសោមនស្ស ហើយអស់ទាំងផ្លូវច្រកនោះក៏ជាសេចក្តីសុខដែរ ។

ប្រាជ្ញាជាដើមឈើនៃជីវិតដល់អស់អ្នកណាដែលចាប់យកបាន ហើយអស់អ្នកណាដែលកាន់ភ្ជាប់ខ្លួន ក៏សប្បាយហើយ ៕

## (តមកនៅទំព័រទី០១) ខ្មែរ Long Beach គ្មានទូរទស្សន៍...

នយោបាយនៅកម្ពុជា និងសហគមន៍របស់ខ្លួន តាមរយៈការមើលទូរទស្សន៍ខ្មែរ នៅ Long Beach ក្រៅពីមនុស្សក្នុងគ្រួសារខ្មែរមួយចំនួន ដែលបានភ្ជាប់បណ្តាញទូរទស្សន៍ខ្មែរមកពីប្រទេសកម្ពុជា តាមរយៈផ្កាយរណបតែប៉ុណ្ណោះ ។

កាលពី4ឆ្នាំមុនថយក្រោយទៅរកអតីតកាលក្នុងទសវត្សឆ្នាំ1990 និងឆ្នាំ 2000 បងប្អូនខ្មែរនៅ Long Beach អាចមើលតាមដានព័ត៌មានតាមរយៈទូរទស្សន៍ខ្មែរប៉ុស្តិ៍លេខ18 នារាល់ថ្ងៃសៅរ៍ និងទូរទស្សន៍ខ្សែកាប (Cable 22) ដែលបងប្អូនខ្មែរមួយចំនួនធំអាចមើល និងបានតាមដានពីស្ថានភាពនយោបាយនៅកម្ពុជា និងស្ថានការណ៍ក្នុងសហគមន៍ខ្លួនជាមួយកម្មវិធីនានាផ្សេងទៀតតាមរយៈទូរទស្សន៍ទាំងនេះ ។ ប៉ុន្តែនៅទីបញ្ចប់ទូរទស្សន៍ទាំង នោះបានបាត់បង់ ឬក្ស័យធនបាត់ស្រមោលឃ្លាតឆ្ងាយពីក្រសែភ្នែកទូរទស្សន៍ទស្សនិកជន ។

រតនៈ អឿន អតីតនាយកទូរទស្សន៍ខ្សែកាបប៉ុស្តិ៍លេខ22 បាននិយាយថា ការដែលបណ្តាញទូរទស្សន៍ខ្សែកាបរបស់ខ្លួនបានបិទមិនមែនគាត ក្ស័យធន ឬអសមត្ថភាពអ្វីទេ គឺជាការបិទដោយក្រុមហ៊ុន Charter ដែលឱ្យម៉ោងយើងចាក់ផ្សាយគេបានបិទ និងលក់ភាគហ៊ុនទេ ។

រតនៈ អឿន និយាយថា ឥឡូវចាប់ពីខែមេសានេះទៅ យើងបានរៀបចំទូរទស្សន៍តាមបែបប្រព័ន្ធអន្តរបណ្តាញ (Internet) ឈ្មោះ Khmer I.P.TV ដែលបងប្អូនអាចមើលឃើញតាំងពីទូរទស្សន៍ជាច្រើននៅស្រុកខ្មែរ និងទូរទស្សន៍ខ្មែរ-អាមេរិកាំង A-ABC នៅ Long Beach ផងដែរ ដោយបងប្អូនគ្រាន់ តែទិញប្រអប់តម្លៃ $150 តែម្តង ដើម្បីភ្ជាប់ប្រព័ន្ធ Internet-DSL និងបង់ប្រចាំខែ $20 ។

ចំណែក Joran នាយកទូរទស្សន៍ទិញម៉ោងប៉ុស្តិ៍លេខ18 រៀងរាល់ថ្ងៃសៅរ៍ ម៉ោង3:00 ដល់ ម៉ោង4:00ល្ងាច បានធ្លាប់និយាយថា យើងបញ្ឈប់ការជួលម៉ោងផ្សាយម៉ោងប្រចាំសប្តាហ៍នោះ ក៏ព្រោះតែគ្មានលទ្ធភាពជួលម៉ោង ព្រោះតម្លៃជួលម៉ោងថ្លៃមិនមានតុល្យភាពចំណូលបានមកពីការចុះផ្សាយពាណិជ្ជកម្មដោយសារទំហំទីផ្សារខ្មែរយើង នៅ Long Beach តូចចង្អៀត មិនមានការគាំទ្រគ្នា ដែលធ្វើឱ្យរូបគាត់ត្រូវតែបិទបញ្ឈប់ការជួលម៉ោងផ្សាយ ។

រតនៈ អឿន និយាយថា ការបរាជ័យវាអាចកើតពីអ្នកធ្វើខ្វះបទពិសោធន៍ជំនាញវិជ្ជាជីវៈ បច្ចេកទេសកម្មវិធីនានា ពិសេសបញ្ហាថវិកា គឺខ្វះការគាំទ្រពីបងប្អូនខ្មែរដូចជាអ្នកគាំទ្រដាក់ការចុះផ្សាយពាណិជ្ជកម្មនោះ ។ ពីព្រោះយើងធ្វើអាជីវកម្មវាសង្ឃឹមទៅលើទីផ្សារក្នុងការគាំទ្រដំណើរការងាររបស់យើង បើយើងដួលរលំនៃការគ្រប់គ្រប់ទីផ្សារពាណិជ្ជកម្មផល របររកស៊ីរបស់យើង មិនអាចទៅមុខវាផ្ទុយពីស្ថានីយទូរទស្សន៍ ដែលមានការគាំទ្រដោយគណបក្សនយោបាយនានា ដែលមិនភ័យព្រួយពីការរលត់រលាយក្នុងបំណងជួយផ្សព្វផ្សាយគោលនយោបាយ និងប្រជាភិថុតនយោបាយរបស់ពួកគេ ។

អតីតអ្នកមានវិជ្ជាជីវៈផ្នែកទូរទស្សន៍, វិទ្យុ, កាសែត សុំមិនបញ្ចេញឈ្មោះ បានប្រាប់ខ្មែរប៉ុស្តិ៍ឱ្យដឹងថា ដំណើរការរកស៊ីការងារផ្នែកទូរទស្សន៍, កាសែត ឬវិទ្យុ វាជោគជ័យទៅបាន គឺអាស្រ័យដោយសារធាតុផ្សំមានលុយ ប៉ុន្តែលុយមិនជាចោទបញ្ហាទេ សំខាន់ការមានទំនាក់ទំនងល្អក្នុងការចេះគ្រប់គ្រងទីផ្សាររកពាណិជ្ជកម្មជាមួយការបង្ហាញនូវស្នាដៃជាវិជ្ជាជីវៈការងារជាដែលមានសមត្ថភាពជំនាញក្នុងការគ្រប់គ្រងកម្មវិធីឱ្យសមស្របទៅនឹងចំណង់ចំណូលចិត្តទូរទស្សន៍ជាមួយអ្វីដែលឯករាជ្យ មិនផលិតឡើងដោយសារការស្អប់ ការខ្លាច ការល្ងិតល្ងង់ និងការស្រឡាញ់នោះ ។ អតីតអ្នកកាសែតជើងចាស់នោះ និយាយថា ទីផ្សារនៅសហរដ្ឋអាមេរិកក៏ដូចជាទីផ្សារបងប្អូនខ្មែរយើង វាមិនតូចចង្អៀតនោះទេ ព្រោះលុយកាក់នៅលើគោកប្រសិនបើយើងចេះស្វែងរកលុយ ដោយរៀបចំកម្មវិធីផ្សាយឱ្យបានត្រឹមត្រូវផ្គុំមនុស្សមានសមត្ថភាពជាវិជ្ជាជីវៈអ្នកសារព័ត៌មាន និងមនុស្សមានទំនាក់ទំនងល្អនៅលើទីផ្សារដើម្បីស្វែងរកពាណិជ្ជកម្មគាំទ្រ ។

កន្លងមកគេតែងសង្កេតឃើញព័ត៌មាននៅតាមទូរទស្សន៍ខ្មែរនាក្រុង Long Beach តែងតែចាក់ការផ្សាយព័ត៌មានដដែលៗ ឬក៏ព័ត៌មានជាយូរថ្ងៃមកហើយ ជាមួយកម្មវិធីនានាហាក់ពុំមានអ្វីដែលអប់រំ ឬផ្តល់គំនិតកសាងសង្គមមនុស្សក្រៅតែពីនាទីកំសាន្តច្រៀងរាំ ខារ៉ាអូខេ និងកំប្លែងលេងសើច ។ល។ និង ។ល។ ដែលនាំឱ្យទូរទស្សន៍ទស្សនិកជនមានការធុញទ្រាន់ក្នុងក្រសែភ្នែក និងអារម្មណ៍លែងចង់មើល ហើយដែលការធុញថប់របស់អ្នកទស្សនានោះ វាបានឮទៅដល់ក្រុមអ្នកគាំទ្រដែលបានដាក់ការជួយផ្សព្វផ្សាយពាណិជ្ជកម្មរបស់ពួកគេ បំណងឱ្យផលរបរពួកគេទទួលនូវការទាក់ទាញភ្ញៀវត្រូវបញ្ឈប់ការផ្សាយ ព្រោះគ្មានអ្នកមើល ធ្វើឱ្យពួកគេអត់ផ្សាយទៅកាន់ហាងរបស់គេ ។ ដូច្នេះការរកស៊ីផ្នែកទូរទស្សន៍ ដែលរស់បានដោយសារការចុះផ្សាយពាណិជ្ជកម្ម (Spot) នោះត្រូវដួលរលំ ។

រតនៈ អឿន បានសារភាពថា កាលពីការចាក់ផ្សាយនៅទូរទស្សន៍ខ្សែកាបប៉ុស្តិ៍លេខ22 គឺព័ត៌មាន ឬកម្មវិធីនានាយើងបានចាក់ផ្សាយជាដដែលៗ ដែលអាចធ្វើឱ្យទូរទស្សន៍ទស្សនិកជនមានអារម្មណ៍លែងចង់មើល ។ ប៉ុន្តែពេលនេះប្រព័ន្ធទូរទស្សន៍តាម Internet (Khmer I.PTV) យើងមានផែនការជាមួយកម្មវិធីប្លែកៗ និងព័ត៌មានពីស្រុកខ្មែរ ឬក្នុងសហគមន៍ផ្លាស់ប្តូរឱ្យទាន់ចិត្តជូនអ្នកទស្សនា ដើម្បីបង្ហាញជាកញ្ចក់




ឆ្លុះបញ្ចាំងសង្គម ការរក្សាវប្បធម៌ អក្សរសាស្ត្រ ប្រពៃណីខ្មែរ ដែលនៅក្រៅប្រទេសត្រូវរួមគ្នាធ្វើអ្វីទាំងអស់គ្នា ដើម្បីឆ្ពោះទៅរកភាពរីកចំរើននៅក្នុងសហគមន៍ខ្មែរយើង ។

តាមបណ្តាញទូរទស្សន៍ផ្កាយរណបភ្ជាប់ពីប្រទេសកម្ពុជានោះ ខ្មែរមួយចំនួនបានភ្ជាប់មើលដោយបង់ប្រចាំខែមានទូរទស្សន៍ជាតិបាយ័ន និង CTN ដែលមានកម្មវិធីនានាជាមួយគោលនយោបាយឃោសនាបែបប្រជាភិថុតឱ្យដល់គណបក្សប្រជាជនកម្ពុជារបស់លោក-នាយករដ្ឋមន្ត្រី ហ៊ុន សែន ច្រើនបំផុត ជាងការផ្សាយព័ត៌មានឯករាជ្យ ។ ប៉ុន្តែទូរទស្សន៍ទាំងនេះមិនបានទាក់ទាញវាយលុកទីផ្សារខ្មែរ ឬសហគមន៍ខ្មែរនៅក្រៅប្រទេស ពិសេសខ្មែរនៅអាមេរិកឱ្យបានជោគជ័យនៅឡើយទេ ព្រោះតែគំនិតសេរីភាពរបស់អ្នកប្រជាធិបតេយ្យនៅអាមេរិក និងគំនិតគាំទ្របែបកុម្មុយនិស្តនៅក្នុងស្រុក វាមិនអាចទាន់ស៊ីសង្វាក់ចូលផ្លូវវិញខ្សែគ្នាបាន ។

នៅទីក្រុងខ្មែរ Long Beach បច្ចុប្បន្នមានកាសែតចំនួន5 គឺកាសែតខ្មែរប៉ុស្តិ៍, អង្គរបុរី, សេរីភាព, ខេមរា និងកាសែតភ្នំពេញថ្មី ទូរទស្សន៍តាម Internet និងផ្កាយរណបមាន KBN, Khmer I.P. TV, AMN រីឯ KF-Live TV បានដួលរលំហើយ ចំណែកឯវិទ្យុគ្មានទេ របស់ឯកជនក្រៅតែពីវិទ្យុជួលម៉ោងផ្សាយព័ត៌មានខ្លះៗពីស្រុកខ្មែរ តាមការអានកាសែត និងកម្មវិធីរបស់សមាគម C.A.A ក្នុងមួយម៉ោងថ្ងៃអាទិត្យជារៀងរាល់សប្តាហ៍ពីម៉ោង 7:00 ដល់ម៉ោង 8:00 PM ក្រោមការគាំទ្រថវិកាពីអង្គការនោះ ៕

ទំព័រ មនោសញ្ចេតនា

# ក្តីស្នេហ៍គ្មានទីបញ្ចប់

( តពីលើកមុន )

មានតែលោកតាមួយអង្គ ជាអ្នកដែលមានគុណលើសលប់ក្នុងជីវិតកូនកំព្រានេះ លោកពិតជារង់ចាំខ្ញុំនៅក្បែរទ្វារកុដិឯវត្តលង្ការឯនោះ ដោយអន្ទះសារហើយ ។ ខ្ញុំមិនដឹងគួរ ទៅទីណាទេក្នុងពេលនេះ តម្រង់ទៅវត្តភ្លាម ដើម្បីថ្វាយបង្គំលោកតាទៅឬ ? ឬក៏រង់ចាំមើលបន្តិចមើលក្រែងមានរឿងអស្ចារ្យកើតឡើង... ខ្ញុំរង់ចាំក្តីសង្ឃឹមមួយដែលមិនអាចនឹងកើតមានឡើង ។ ដៃទាំងពីររបស់ខ្ញុំយួរនូវរបស់របរសំបុកសម្បត្តិប្រមូលបានមកពីមជ្ឈមណ្ឌល ដាឡាត ក្រោយពេលសន្សំសន្សំជាងមួយឆ្នាំដើយួរលង់។ ដើរចុះដើរឡើងក្នុងរបៀងរង់ចាំ ភ្នែកគយគន់រំពៃក្រែងលោមានស្រមោលនារីម្នាក់មកចាំទទួល តែគ្មានទេ អូនមិនព្រមមកទទួលបងទេ អូនដាច់ចិត្តមិនមកទទួលបងមែនហើយឬ ? ។ ជាងមួយឆ្នាំ ដេកនឹក ដេកស្រមៃ សំបុត្រឆ្លងឆ្លើយរាប់មិនអស់ ម៉ោងពេលមកដល់បងបានរំលឹកហើយរំលឹកទៀត ស្មានថា ពេលចុះពីយន្តហោះបងនឹងបានឃើញមុខអូន ឥឡូវបងមកដល់ស្រុកហើយ តើអូននៅដល់ទីណា ?

បាត់អូន បាត់អូន សូន្យសឹងហើយ ព្រលឹងមាសអើយនៅទីណា ?
អូនដឹងថាបងអន្ទះសារ  រង់ចាំជីវ៉ាយ៉ាងណាទេ ? ។
ចាំបាត់ចាំបាត់មិនឃើញមក  ឱពៅពន្លកយ៉ាងណា ?
មានហេតុអ្វីទៅពៅជីវ៉ា  ទើបកែវជីវ៉ាបាត់សូន្យឈឹង ? ។
ឬអូនផ្លាស់ចិត្តពីបងហើយ  សមម្លេះពៅអើយបងកំព្រា
ពីថ្ងៃនេះទៅសែនវេទនា  ចិត្តបងគ្រាំគ្រាដូចគេជិះ ។
ណ្ហើយចុះតាមវាសនាកម្ម  រុញច្រានខ្លួនខ្ញុំដល់ឋានណា
ធ្មេចភ្នែកទៅមុខតាមយថា  កម្មខ្លួនបានចារចងទុកមក ។
ពីតូចដល់ធំស្គាល់តែទុក្ខ  ស្មានថាបានសុខគ្រាជួបពៅ

ឱវាសនាអើយពពកខ្មៅ បានចូលមកដល់បាំងទៀតហើយ ។

នៅតែមានកូនក្តីសង្ឃឹមមួយបាន នាំឱ្យខ្ញុំចេះតែខំដើរចុះដើរឡើងកាត់ហ្វូងមនុស្ស ដែលកំពុងរង់ចាំញាតិសន្តាន របស់គេនឹងមកដល់តាមជើងយន្តហោះក្រោយទៀត ។ ពួកគេទាំងអស់គ្នាចោលភ្នែកសម្លឹងមកខ្ញុំយ៉ាងយកចិត្តទុកដាក់ ។ មិនដឹងគេសម្លឹងខ្ញុំដោយឆ្ងល់ថា ហេតុអ្វីបានជាខ្ញុំដើរទៅមកមិនចេះហត់នឿយ ឬគេឃើញខ្ញុំសង្ហា ដោយមានសក្តិក្រហមឆ្អៅលើស្មា ? ។ ខ្ញុំហាក់ដូចជាចង់អៀនខ្មាស់ក្រោមការសម្លឹងរបៀបនេះ ។ស្រាប់តែបុរសម្នាក់ក្នុងសំលៀកបំពាក់ស្អាតបាត សុភាពរំទំបានដើរមករកខ្ញុំ លើកដៃសំពះគួសម " សុំជំរាបសួរលោក លោកជានាយទាហានទើបមកពីហាត់នៅស្រុកយួនមែនទេ " "ខ្ញុំឆ្លើយយ៉ាងប្រញាប់ មែនហើយប្អូន ប្អូនមានការអីដែរ ? ក្មេងជំទង់នោះ ញញឹមរាក់ទាក់ឆ្លើយថា " ខ្ញុំឈ្មោះ ច្រក តាយកុង គាត់ស៊ីស្រុកអង្គតាសោម អ្នកគ្រូកល្យានបុប្ផា គាត់បានពឹងឱ្យខ្ញុំយកសំបុត្រនេះមកជូនលោក " ។

ពេលទទួលសំបុត្រមកក្នុងដៃហើយចិត្តខ្ញុំសែនរន្ធត់ គួរបើមើលភ្លាម ឬចាំដល់កុដិជាទីស្នាក់អាស្រ័យសិនចាំបើកមើល ? ឬក៏បើកមើលភ្លាម ដើម្បីឱ្យដឹងថា នាងចង់ប្រាប់រឿងអ្វី ? មានសេចក្តីយ៉ាងណា ? ។ កំពុងតែអល់អែក ស្រាប់តែ "តាយកុង" គាត់ស៊ីឱទានឡើង "អ្នកគ្រូកល្យានបុប្ផា បានឱ្យខ្ញុំជម្រាបលោកថា សុំឱ្យលោកអានសំបុត្រឱ្យហើយមុនពេលដែលខ្ញុំត្រូវលាលោកទៅវិញ ក្រែងលោមានអីចង់ឱ្យខ្ញុំទៅជម្រាបគាត់វិញដែរឬអី? ខ្ញុំទើបភ្ញាក់ខ្លួនថា ត្រូវបើកសំបុត្រមើលសិនចាំគិតអ្វីៗ ក្រោយទៀត ខ្ញុំទ្រង់ញ័រដៃបន្តិច ព្រោះចំបែងមិនដឹង តើមានរឿងអី ទើបមិនព្រមមកជួបឬនាង ? ចុងក្រោយបំផុតសំបុត្រក៏ត្រូវទាញចេញពីស្រោមមកអាន:

អង្គតាសោមថ្ងៃទី១៨ ធ្នូ ឆ្នាំ១៩
បងវិរៈជាទីស្រឡាញ់ ! ( **នៅមានត** )

## ការសែតខ្មែរប៉ុស្តិ៍ នៅ " រ៉ូដអាឡិន "

❖❖❖លោកអ្នកអាន "ខ្មែរប៉ុស្តិ៍" នៅរដ្ឋអាឡិន អាចអញ្ជើញរកកាសែតរបស់អស់លោកអ្នកបាន នៅ ប្រូវិដិន តាមហាងពាណិជ្ជកម្មដូចតទៅ :

1- ASIAN STAR MARKET
618 ELMWOOD AVENUE
PROVIDENCE RI 02907

2- VIDEO CHHAY SAVANN
384 ELMWOOD AVENUE
PROVIDENCE, RI 02907
Phone :(401)588 9306

3- FRIENDSHIP MARKET
187 MESER STREET
PROVIDENCE, RI 02907
Phone : (401) 274 3744

4- KHMER WORLD VIDEO (KW)
310 RESERVOIR AVENUE
PROViDENCE, RI 02907
Phone : 401- 467 5900

តម្លៃផលិតកាសែត នឹងផ្ញើបានកើនឡើងយ៉ាងខ្ពស់ ហេតុនេះ សូមលោកអ្នកអានមេត្តាអធ្យាស្រ័យចំពោះការដាក់តម្លៃ៥០សេន ក្នុងការជាវកាសែតមួយច្បាប់ ចាប់ពីពេលនេះទៅ នៅទីចាត់ការខ្មែរប៉ុស្តិ៍ ៕



# សិល្បៈនៃការប្រើប្រាស់នូវក្ដីសុខដល់ខ្លួនប្រាណ

**ដោយ : អ៊ុម ឈឿម**

●ការដែលមនុស្សម្នាក់ទទួលបាននូវក្ដីសុខស្រណុកប្រាណ ឬមានអារម្មណ៍សប្បាយចិត្តគំនិតថ្លាយ៉ាងណានោះ ពុំមែនស្ថិតនៅលើការដែលយើងពុំធ្លាប់បានជួបប្រទះនូវឧបសគ្គរារាំង ឬស្ថិតនៅលើគំនរទ្រព្យសម្បត្តិមាសប្រាក់ ពេជ្រពិទូរ្យកាន្តនោះឡើយ ។ ផ្ទុយទៅវិញក្ដីសុខក្នុងអារម្មណ៍ត្រូវបានកើតឡើង ដោយការធ្វើនូវអ្វីបានសម្រេចនូវជោគជ័យទៅតាមការចង់បានរបស់យើងតែម្នាក់ ដូច្នេះក្ដីសុខពុំមែនស្ថិតនៅលើជញ្ជាំងវណ្ណៈក្រ ឬមាននោះឡើយ ដោយមនុស្សម្នាក់ៗ ក៏អាចបង្កើតនូវក្ដីសុខគ្រប់ៗគ្នា ក៏គ្រាន់តែប្រភេទនៃក្ដីសុខទាំងនោះ មានលក្ខណៈផ្សេងៗពីគ្នាតែប៉ុណ្ណោះ ។

ក្ដីសុខក្សេមក្សាន្តសម្រាប់មនុស្សមួយចំនួនត្រូវបានកើតឡើងដោយការសម្រាកកាយសប្បាយអារម្មណ៍នៅក្នុងគេហដ្ឋាន ឬក៏អានកាសែត និងអានទិនានុប្បវត្តិនានាផ្សេងៗ ។ សម្រាប់មនុស្សមួយចំនួនទៀត ក្ដីសុខរបស់ពួកគេ ត្រូវបានកើតឡើងដោយការផឹកស៊ី ហូបចុក បានដើរលំហែរកំសាន្ត ឬបានកំសាន្តសប្បាយនៅក្នុងក្លឹបរាត្រីសមោលសរជាដើម ។ល។ តែសម្រាប់មនុស្សមួយចំនួនទៀត គ្រាន់តែបានទទួលនូវការសរសើរបញ្ជោរបន្តិចបន្តួចពីចៅហ្វាយនាយ ឬពីអ្នកផ្សេងតែប៉ុណ្ណោះនោះក្ដីសុខក៏កើតឡើងភ្លាមដែរ ។

មនុស្សភាគច្រើនតែគិតថា ការជាប់ញៀន ឬការជាប់ចិត្តជិតអារម្មណ៍ទៅនឹងវត្ថុអ្វីម្យ៉ាងនោះ គឺជាក្ដីសុខរបស់គេទៅហើយ ។

ជាការពិតណាស់អ្នកចិត្តសាស្ត្រក៏បានថ្លែងដែរថា ក្ដីសុខដ៏ពិតប្រាកដមួយ គឺស្ថិតលើលោកយើងជាអ្នកកំណត់ទាំងអស់ ។ មានន័យថា ទោះបីជាយើងជួបនូវក្ដីសុខក្សេមក្សាន្ត ឬក៏ជួបនូវទុក្ខសោកយ៉ាងណាក្ដីទាំងអស់នេះ វាស្ថិតនៅលើខ្លួនយើង ទាំងអស់ ។

សិល្បៈនៃការញ៉ាំងជីវិតប្រចាំថ្ងៃឱ្យមានលក្ខណៈល្អប្រពៃបំផុតនោះ គឺការបើកភ្នែកមើលមហាចក្រវាឡដោយបំណងល្អ និងដោយអារម្មណ៍សុគតិ ។ មួយវិញទៀតចំពោះការផ្ដល់នូវក្ដីស្រឡាញ់រាប់អាន និងយល់ចិត្តថ្លើមចំពោះអ្នកដទៃ ព្រមទាំងមានបំណងល្អជាមួយមនុស្សនៅក្បែរខ្លួនយើង និងគ្មានគំនិតអាក្រក់ពុំមានគំនិតអាឃាដ ឬព្យាបាត, មិនលោភលន់, មិនក្រេវក្រោធ, មិនភ័យខ្លាចចំពោះហេតុការណ៍នានាដែលពុំទាន់ឈានមកដល់ និងពុំមានអារម្មណ៍ច្រណែនឈ្នានីសអ្នកដទៃទាំងអស់នេះហើយជាដើមហេតុនាំឱ្យយើងមានវិថីជីវិតដ៏សុខក្សេមក្សាន្តមួយ ។

ចំពោះបុគ្គលដែលតែងតែមានទស្សនៈគតិគិតតែពីច្រណែនឈ្នានីសអ្នកដទៃគ្រប់ពេលវេលាទីបំផុតបុគ្គលទាំងនោះ តែងតែទទួលតបស្នងមកវិញនូវក្ដីទុក្ខសោកវិយោគកើតមានជាប្រចាំ។ យើងត្រូវយល់ថា ក្នុងមួយថ្ងៃៗមនុស្សយើងម្នាក់ៗ មានពេលវេលាត្រឹមតែ២៤ម៉ោងប៉ុណ្ណោះ ដូច្នេះក្នុងថេរៈវេលានេះ ជាចំនួនដ៏ខ្លីបំផុតសម្រាប់ស្វែងរកក្ដីសុខដល់ខ្លួនយើង ដោយហេតុនេះយើងគប្បីបញ្ឈប់នូវគតិអគតិនានាដែលជាដើមហេតុនាំឱ្យកើតនូវក្ដីទុក្ខសោក ។

បើយើងធ្វើប្រមាណវិធី ឬគណនាចំពោះអាយុ ៧០ ឆ្នាំ នៃការរស់រានមានជីវិតរបស់មនុស្សម្នាក់ឃើញថាមានពេលវេលាដ៏ខ្លីត្រឹមតែ៣៧៨០អាទិត្យតែប៉ុណ្ណោះ ។ ក្នុងចំនួននេះ បើយើងធ្វើខ្សែជីវិតឱ្យមានក្ដីសុខផូរផង់រុងរោចន៍ ឬក្ដីទុក្ខសោកយ៉ាងណានោះ គឺស្ថិតនៅលើគំនិតនិងការប្រព្រឹត្តរបស់យើងផ្ទាល់តែម្ដង ។ "មោភនៈភាពដ៏អស្ចារ្យមួយពុំមែនស្ថិតនៅ ការពុំធ្លាប់ទទួលនូវភាពបរាជ័យនោះឡើយ ក៏ប៉ុន្តែតាមពិតវាស្ថិតនៅលើការក្រោកឈរតតាំងជាមួយនឹងភាពបរាជ័យនានា " ៕



# អត្ថប្រយោជន៍ប្រវត្តិសាស្ត្រ



**ដោយ : ម៉ម ឃិន**

ប្រវត្តិសាស្ត្រជាមេរៀន ទុកសំរាប់ប្រៀនប្រដៅមនុស្ស
ឱ្យដឹងរឿងពិតមានទាំងអស់ ពីមុនមកនោះ នៃដូនតា ។
ជាអ្នកដឹកនាំកិច្ចការជាតិ ខ្លះត្រូវខ្លះឃ្លាតពីតម្រា
ធ្វើឱ្យបានសុខ ឬទុក្ខា ទៅតាមបញ្ញាការយល់ដឹង ។
ហេតុដូច្នេះហើយធ្វើឱ្យរាស្ត្រ ហើយនឹងប្រទេសគ្មានលំនឹង
ម្ដងឡើងម្ដងចុះ ទន់ហើយរឹង រាស្ត្រត្រូវតែប្រឹងខំតស៊ូ ។
ពេលណាមានមេមានប្រាជ្ញា មានចិត្តហានក្លា គ្មានក្ដីថ្ងូ
យកជីវិតពាំងសុខចិត្តប្ដូរ ទោះបីបង្ហូតទាំងលោហិត ។
មេដឹកនាំនោះពិតជាប្រាជ្ញា មានចិត្តអង់អាចស្មោះត្រង់ពិត
ដឹកនាំប្រទេសជាតិពិសិដ្ឋ ឱ្យបានស្ថេរស្ថិតជារៀងរហូត ។
រឿងនេះបានដឹងមកដោយសារ ប្រវត្តិសាស្ត្របានចារឱ្យរៀនសូត្រ
ទុកឱ្យកូនចៅមានចង្អុត កាច់បត់បែនស្រួតនាវាជាតិ ។
ហើយខំសិក្សាប្រវត្តិសាស្ត្រ ទើបបានដឹងច្បាស់ ហើយប្រឹងឆ្លៀត
ខិតខំរក្សាមិនឱ្យឃ្លាត សាមគ្គីពេញខ្នាតជាតិឯងពិត ។
អត្ថប្រយោជន៍ប្រវត្តិសាស្ត្រ មានធំខ្លាំងណាស់ដល់បណ្ឌិត
លោកតែងតំកល់ទុកក្នុងចិត្ត ហើយប្រឹងប្រៀនព្រឹទ្ធជនទូទៅ ។
ឱ្យបានស្ថិតនៅក្នុងមាតា ហើយខំយាត្រាក្នុងផ្លូវត្រូវ
នាំជាតិនាំស្រុកដើរសំដៅ តម្រង់ត្រង់ទៅសុខសាន្តអើយ ៕

## (តមកនៅទំព័រទី០១) ហ៊ីឡាដែលហ៊ីយ៉ា : ក្រសួងអប់រំមាន...

ដើម្បីបង្កើនគុណភាពសិក្សារបស់កូនចៅទៅក្នុងកម្មវិធីថ្មីរបស់ស្គូលឌីស្ទ្រីក ។

ថ្ងៃទី១៩ នេះ អ្នកស្រីបណ្ឌិត អាលីន អាកម៉ាន់ បានប្រកាសនៅចំពោះមុខមាតាបិតាប្រមាណ ១ពាន់នាក់ នៃហ្វីឡាដែលហ្វៀ អំពីអាទិភាពនៃការកែទម្រង់កម្មវិធីសិក្សា ដោយត្រូវការការចូលរួមពីមាតាបិតាទាំងអស់ ។ ហ្វីឡាដែលហ្វៀ ជាតំបន់ដែលរដ្ឋបាលថ្មីនៃសហរដ្ឋអាមេរិក ត្រូវយកចិត្តទុកដាក់ជាចំបង ដោយសារឱនភាពសេដ្ឋកិច្ច-ជោគជ័យនៃការអប់រំធ្លាក់ដុនដាប-ឧក្រិដ្ឋកម្មរីកសុះសាយ គឺមានតែវិស័យអប់រំ ដែលអាចនឹងផ្តល់ចម្លើយវិជ្ជមានសម្រាប់សង្គមដ៏កំសត់មួយនេះ ។ ចំណែកឯសហគមន៍ខ្មែរវិញ កំពុងរងគ្រោះរឹតតែខ្លាំងជាងគេថែមទៀត ដោយសារតែបន្ថែមពីលើហាយនភាពរបស់សង្គមខ្មែរ មានបញ្ហាផ្នែកភាសា បញ្ហាវប្បធម៌ បញ្ហាបែកបាក់សាមគ្គីធ្វើឱ្យជំងឺសង្គមរឹតតែរីងរៃកាន់តែខ្លាំង ។ ថ្ងៃទី១៩ នេះ សហគមន៍ខ្មែរប្រមាណ ១០០នាក់ ដឹកនាំដោយវត្តព្រះពុទ្ធរង្សី-សមាគមខ្មែរ-សមាគមព្រឹទ្ធាចារ្យ- យូណាយធីត កុម្មូនីធី-ក្រុមគាំទ្រគ្រួសារ បានបង្ហាញឱ្យស្គូលឌីស្ទ្រីក ឃើញច្បាស់ថា មានការប្រែប្រួលដ៏សំខាន់មួយ គឺការពូតដៃគ្នាប្រយុទ្ធ នឹងអវិជ្ជារបស់កូនចៅជាមួយនឹងកម្មវិធីស្គូឌីស្ទ្រីក ក្នុងអនាគតឆាប់ៗនេះ ។

នៅក្នុងបន្ទប់ ៣០៧ នៃវិទ្យាល័យក្រុមជំនុំបញ្ហាខ្មែរ បានផ្តល់នូវឱវាទមួយចំនួនដល់អ្នកស្រីលិនដា ឆិន នាយកអប់រំបកប្រែជាភាសាខ្មែរ ដោយ ឆានី គឺមានជាអាទិ បញ្ហាប្រស្រ័យទាក់ទងរវាងគ្រូ និងមាតាបិតាឱ្យបានជិតស្និទ្ធ និងប្រសើរកម្មវិធីដែល នឹងជួយដល់ចំណេះភាសាសំរាប់ទាក់ទង- ជួយឱ្យមានការណែនាំដល់មាតាបិតាក្នុងវិជ្ជា ទំនាក់ទំនងនឹងកូនចៅ ។ល។

សុខ ឈុត បានឱ្យយោបល់ថា " គួរតម្រូវឱ្យមានវិន័យក្នុងសាលាឱ្យបានគ្រប់គ្រាន់ និងគួរឱ្យសិស្សមានពាក់ឯកសណ្ឋានផង ។ រីឯ វន បានតាំងសំនួរថា " នៅពេលគ្រូឱ្យពិន្ទុក្មេងមិនត្រឹមត្រូវ តើឱ្យក្មេងទៅតវ៉ាយ៉ាងណាបាន ?" ហើយនៅមានសំនួរ និងការផ្តល់យោបល់ច្រើនរហូតដល់ពេលរកឱកាសបញ្ចប់ស្ទើរមិនបាន ។ ព្រះអង្គរដ្ឋមុនី ចៅអធិការវត្តព្រះពុទ្ធរង្សី , រ៉ូបឺត, ថាវរ៉ូ មិននិយាយស្តីច្រើន ឬសួរអ្វីទេ ប៉ុន្តែបានជួយណែនាំក្រុមគ្រួសារយ៉ាងសកម្ម ៕











ព្រះអង្គ រដ្ឋមុនី, រ៉ូបឺត, ថាវរ៉ូ, មិនមានមាត់កច្រើនតែបានជួយណែនាំក្រុមគ្រួសារខ្មែរយ៉ាងសកម្ម

## ខ្មែរប៉ុស្តិ៍សូមអញ្ជើញលោកអ្នកមកចូលរួម

"ក្លឹបសារព័ត៌មាន"

PRESS CLUB

ថ្ងៃទី២៩ មីនា ឆ្នាំ២០០៩ វេលាម៉ោង ១១:៣០ព្រឹក នៅភោជនីយដ្ឋាន GOLDEN PALACE ជ្រុងផ្លូវ WASHINGTON និងផ្លូវលេខ៨ PHILADELPHIA.

ទូរស័ព្ទ : 267-253-3974



## ជីវិត និងការងារត្រាច់ចរនៅទ្វីបអាស៊ី

San Jose: មាជ សុវណ្ណារ៉ា

●●● កូនខ្មែរ-អាមេរិកាំងម្នាក់ដែលធំដឹងក្តីនៅលើទឹកដីអាមេរិកនាក្រុង San Jose រដ្ឋ California ភាគខាងជើង កំពុងត្រូវបានទទួលនូវការស្ងើចសរសើរ និងឱ្យតម្លៃការងារជាអ្នកបច្ចេកទេសវិទ្យាដ៏ទំនើបក្នុងយុគសម័យថ្មីនៃប្រព័ន្ធព័ត៌មានពីបណ្តាលអ្នកដឹកនាំក្រុមហ៊ុនធំៗ ក្នុងប្រទេសនានានៃទ្វីបអាស៊ី ដែលនេះវាជាមោទនភាពមួយចំពោះជាតិខ្មែរដែលមានអ្នកប្រាជ្ញខ្មែរវ័យក្មេងជំនាន់ក្រោយ ។



ទុយ ប៊ុនធឿន អាយុ41ឆ្នាំ បញ្ចប់ការសិក្សានៅសាកលវិទ្យាល័យ San Jose បច្ចុប្បន្នក្លាយជាវិស្វករនៅក្នុងក្រុមហ៊ុនអាមេរិកាំងដ៏ធំបំផុតមួយ ដែលការលាក់ការណ៍សម្ងាត់មិនឱ្យបញ្ចេញឈ្មោះក្រុមហ៊ុននោះ បានប្រាប់ខ្មែរប៉ុស្តិ៍ឱ្យដឹងថា គាត់ធ្វើការជាមួយក្រុមហ៊ុនមួយនេះជាង10ឆ្នាំទៅហើយ ដោយភាគច្រើននៃការងារជំនាញរបស់គាត់គឺ ស្ទើរ 70% ត្រូវជិះយន្តហោះទៅធ្វើការនៅប្រទេសជឿនលឿនដែលប្រើប្រាស់សំភារៈបច្ចេកវិទ្យាទំនើបៗបែបទាន់សម័យ ដូចជា ប្រទេសចិន, តៃវ៉ាន់, សិង្ហបុរី, ម៉ាឡេស៊ី, ឥណ្ឌា, ថៃ និង កូរ៉េខាងត្បូងជាដើម ។ ដែលមួយជីវិតការងាររបស់គាត់ជាមួយក្រុមហ៊ុនមួយនេះ ស្ទើរខ្ជិលជិះយន្តហោះទៅហើយ ព្រោះពេលខ្លះជិះយន្តហោះទៅមកដេកបានមួយយប់ក៏ត្រឡប់មកវិញ ក្នុងដំណើរបេសកកម្មទៅកាន់ប្រទេសនានានៅតំបន់អាស៊ី ដោយសារភារកិច្ចការងារមមាញឹកនៅឯសហរដ្ឋអាមេរិកដែលត្រូវការរូបគាត់ជាចាំបាច់ ។

ទុយ ប៊ុនធឿន និយាយថា ជំនាញរបស់គាត់ងាយនិងគ្រោះថ្នាក់ដល់ជីវិតក្នុងមួយពព្រិចភ្នែក ប្រសិនបើមិនប្រុងប្រយ័ត្នក្នុងស្មារតីផ្សំសារធាតុនៃប្រព័ន្ធបច្ចេកវិទ្យាទំនើបៗនោះ ព្រោះវាជាគ្រឿងសំភារៈផ្នែកអាស៊ីដ និងជាតិផ្ទុះសម្លាប់មនុស្ស ។ ដែលមានធាតុផ្សំរហូតទៅដល់60% នៃសារធាតុ Dophan Si និង Phos ដោយ ប៊ុនធឿន គឺជាអ្នកបង្រៀន ជាអ្នកដំឡើង និងជាអ្នកផ្សំ ផលិតជួសជុលទៀតផង ។ (តនៅទំព័រទី២០)

# ក្រុងខ្មែរ Long Beach ត្រៀមខ្លួនរៀបចំការដង្ហែក្បួនលើកទី5

**ឡុងប៊ិច, ខ្មែរប៉ុស្តិ៍ : រ៉ាន់ថ**

●●●នៅក្នុងសេចក្តីប្រកាសព័ត៌មានមួយរបស់សភាសង្គមខ្មែរ (Cam-CC) ដែលខ្មែរប៉ុស្តិ៍ទទួលបានតាមសារអ៊ីមែល បានបញ្ជាក់ថា ក្រុមខ្លួន សមាគមនានា និងសហគមន៍ខ្មែរចូលរួមប្រមាណ 15000នាក់ គ្រោងនឹងរៀបចំការដង្ហែក្បួនព្យុហយាត្រាដើម្បីអបអរសាទរបុណ្យចូលឆ្នាំខ្មែរ ជាលើកទី5 នៅថ្ងៃអាទិត្យ ទី5 ខែមេសា ឆ្នាំ2009 ។ បន្ទាប់ពីពិធីមួយនេះត្រូវបានគេរៀបចំជាបន្តបន្ទាប់មកតាំងពីឆ្នាំ 2005 ។

សេចក្តីប្រកាសព័ត៌មាននោះបាននិយាយថា មនុស្សម្នានឹងរៀបចំតុបតែងខ្លួន សំភារៈរថយន្តជាក្បួន ជាជួរតាមដងផ្លូវ Anaheim ដែលជាកណ្តាលបេះដូងសហគមន៍ខ្មែរក្រុង Long Beach ចម្រុះទៅដោយក្រុមរបាំបុរាណខ្មែរ អ្នកសិល្បៈចម្រៀងសម័យ ពួកឈ្មួញខ្មែរ បរទេស ក្រុមនិស្សិត អ្នករដ្ឋការស៊ីវិល តារាបង្ហាញម៉ូតជាដើម ដែលនឹងដើរក្បួនឱ្យខ្មែរមកពីគ្រប់ទិសទីនៅក្នុងសហរដ្ឋអាមេរិកបានទស្សនាកំសាន្ត ។ នៅក្នុងសេចក្តីប្រកាសព័ត៌មាននោះដែរ ក៏បានប្រាប់ពីដំណើរធ្វើពិធី ជួបជុំគ្នាលេងសប្បាយក្នុងថ្ងៃចូលឆ្នាំខ្មែរ មានរាំលេងកំសាន្តជាមួយក្រុមតន្ត្រីសម័យ ទស្សនាការបង្ហាញពីវប្បធម៌ខ្មែរ របាំ





បុរាណ របាំត្រុដិខ្មែរ មានការលក់ដូរសំភារៈផ្សេងៗតាមតូប ការតាំងពិព័រណ៍ ។ល។ ដែលពិធីបន្ទាប់លើកទី2 ក្រោយពីការដង្ហែក្បួនព្យុហយាត្រា គឺត្រូវប្រព្រឹត្តិទៅនៅថ្ងៃសៅរ៍ ទី25 ខែមេសា ឆ្នាំ 2009 នៅសួនច្បារដែល El Dorado ដោយសំបុត្រចូលទស្សនា ក្នុងតម្លៃ 23ដុល្លារ ក្នុងឡានមួយជាមួយតម្លៃផ្ញើឡាន 7 ដុល្លារទៀតផង ។

ក្រុមអ្នករៀបចំពិធីនេះមួយចំនួននិយាយប្រាប់ខ្មែរប៉ុស្តិ៍ថា ឆ្នាំនេះហាក់ដូចជាពុំមានការរៀបចំពិធីដង្ហែក្បួនព្យុហយាត្រាអធិកអធមធំដូចឆ្នាំមុនៗទេ ព្រោះតែបញ្ហាវិបត្តិសេដ្ឋកិច្ច និងហិរញ្ញវត្ថុ ដែលជាឧបសគ្គដល់អ្នកបានគាំទ្រ ។ ប៉ុន្តែពួកគេនៅតែបន្តធ្វើក្នុងបំណងមួយកុំឱ្យវាបាត់បង់នូវអ្វីដែលយើងធ្លាប់មាន និងបានធ្វើកន្លងមក ដែលពួកគេគិតថា ជាមុខមាត់សហគមន៍ខ្មែរ ការលើកកំពស់វប្បធម៌-អរិយធម៌ខ្មែរចំពោះមជ្ឈដ្ឋានអន្តរជាតិ ពិសេសបងប្អូនខ្មែរនៅ Long Beach ដែលជាក្រុង ឬតំបន់ខ្មែរមួយធំបំផុតនៅក្រៅប្រទេស ។ ក្រុមអ្នករៀបចំបានអំពាវនាវចំពោះបងប្អូនឱ្យចូលរួមក្នុងពិធីទាំងនេះ និងគាំទ្រថវិកា ដើម្បីទ្រទ្រង់កម្មវិធីនេះផងដែរ ។

អ្នកតាមដានស្ថានការណ៍ពីបញ្ហាបងប្អូនខ្មែរ Long Beach និយាយថា ពិធីបុណ្យចូលឆ្នាំខ្មែរ គឺជាពិធីបុណ្យប្រពៃណីជាតិ តំណាងជាតិខ្មែរមួយនៅក្រៅប្រទេស ត្រូវបានគេទន្ទឹងរង់ចាំមើលថា តើការសាមគ្គីគ្នាវាកើតមានដើម្បីលើកស្ទួយវប្បធម៌ជាតិខ្លួនបានឬទេ ? គឺវាស្ថិតនៅថ្ងៃប្រារព្ធដែលអាចនឹងឆ្លុះបញ្ចាំងពីស្ថានភាពពិត ! ។ អ្នកតាមដានដាក់សំណួរថា តើបងប្អូនខ្មែរអាចដាក់ការប្រឆាំងគ្នា ការមើលមុខគ្នាមិនចំ ការប្រកាន់បក្ខពួកក្រុមគ្នាពីអតីតកាលទុកឱ្យនៅមួយឡែកសិនបានទេ ? ដោយងាកមករកការលើកស្ទួយតម្លៃជាតិខ្លួន អត្តសញ្ញាណនៃវប្បធម៌ខ្មែរតាមការរួបរួមកម្លាំងគ្នាដើម្បីបង្ហាញឱ្យមជ្ឈដ្ឋានអន្តរជាតិមើលឃើញបានទេ ? ៕

# សង្គមស៊ីវិលជំរុញឱ្យអាស៊ានកែប្រែច្បាប់សិទ្ធិមនុស្ស

**ភ្នំពេញ, ខ្មែរប៉ុស្តិ៍ ៖ ចាន់ កុសល**

•••ដោយមើលឃើញពីចំណុចខ្វះខាតតួនាទីភាពមិនឯករាជ្យរបស់ខ្លួនក្នុងការបំពេញតួនាទីជូនប្រជាពលរដ្ឋអង្គការសង្គមស៊ីវិលដែលមានចំនួន21ក្នុងប្រទេសបានសំណូមពរដល់រាជរដ្ឋាភិបាលកម្ពុជា និងសមាគមអាស៊ានឱ្យធ្វើសេចក្តីព្រាងច្បាប់ថ្មីទាក់ទិនទៅនឹងសិទ្ធិមនុស្សឱ្យបានកាន់តែល្អឡើងវិញ ។

លោក សុក សំអឿន ប្រធានគណៈកម្មាធិការសមាគមសិទ្ធិមនុស្ស និងជាប្រធានអង្គការក្រុមអ្នកច្បាប់ការពារសិទ្ធិមនុស្សកម្ពុជា បានថ្លែងក្នុងសន្និសីទកាសែតថា យើងត្រូវការគណៈកម្មាធិការអាស៊ានដែលមានអំណាច ហើយអង្គការសង្គមស៊ីវិលទូទាំងតំបន់បានបញ្ចេញមតិដើម្បីឱ្យអង្គការសិទ្ធិមនុស្សអាស៊ានមានអំណាចគ្រប់គ្រាន់ ។

លោក សុក សំអឿន បានបន្តថា ក្រុមរដ្ឋមន្ត្រីការបរទេសអាស៊ាននឹងយកសំណើរបស់យើងទៅធ្វើការពិចារណា ហើយបញ្ហានេះនឹងដាក់ជូនអង្គប្រជុំអាស៊ាននៅដំណាច់ខែកក្កដាខាងមុខនេះ ។

ចំណែកលោក ធន សារាយ ប្រធានសិទ្ធិមនុស្ស អាដហុក បានមានប្រសាសន៍ក្នុងសន្និសីទថា អង្គការសង្គមស៊ីវិលនឹងដាក់ជូននូវអនុសាសន៍ចំនួន15ចំណុចដល់អាស៊ាន ដែលក្នុងនោះ គឺអំណាចរបស់គណៈកម្មាធិការសិទ្ធិមនុស្សដែលឯករាជ្យ និងមានសិទ្ធិអំណាចអាចធ្វើកិច្ចការចុះផ្សាយពីលទ្ធផលរបស់ខ្លួនប្រកបដោយប្រសិទ្ធិភាពខ្ពស់ ។


លោក ធន សារាយ តំណាងអង្គការសង្គមស៊ីវិល ធ្វើសន្និសីទកាសែត


អ្នកស្រី ពុង ឈីវកេក នាយិកាអង្គការសិទ្ធិមនុស្សលីកាដូ

លោកប្រធានសមាគមសិទ្ធិមនុស្សអាដហុកក៏បានបញ្ជាក់ថា គណៈកម្មាធិការមានសិទ្ធិត្រឹមតែទទួលនូវពាក្យបណ្តឹងពីជនរងគ្រោះ និងជួយការពារប៉ុណ្ណោះ គឺមានតែតួនាទីរាយការណ៍ជូនរដ្ឋមន្ត្រីការបរទេសអាស៊ានប៉ុណ្ណោះ ។ សព្វថ្ងៃនេះមានករណីរំលោភសិទ្ធិមនុស្សកាន់តែច្រើន ដែលកើតមានពីសំណាក់មន្ត្រីរដ្ឋបាល និងពួកឈ្មួញទៅលើពលរដ្ឋស្លូតត្រង់ ។

លោក ធន សារាយ ក៏បានបញ្ជាក់ថា មានបញ្ហាជាច្រើនព្រមទាំងឧបសគ្គជាបន្តបន្ទាប់បានរារាំងចំពោះការបង្កើតសិទ្ធិមនុស្សដ៏មានប្រសិទ្ធិភាពតាមរយៈអង្គការអាស៊ាននេះ ។

ចំណែកអ្នកស្រី ពុង ឈីវកេក នាយិកាអង្គការសិទ្ធិមនុស្សលីកាដូ ក៏បានសំដែងនូវការគាំទ្រ ចំពោះការលើកឡើងរបស់លោក សុក សំអឿន និងលោក ធន សារាយ យ៉ាងខ្លាំង ។ ជាពិសេសអ្នកស្រីក៏បានទទូចឱ្យគណៈកម្មាធិការអាស៊ានអនុម័តច្បាប់សិទ្ធិមនុស្សក្នុងតំបន់ឱ្យបានទូលំទូលាយ និងឆាប់រហ័ស ដើម្បីឱ្យសិទ្ធិមនុស្សនៅកម្ពុជាមានដំណើរការល្អ ។

ទាក់ទិនទៅនឹងសេចក្តីថ្លែងការណ៍របស់សម្ព័ន្ធភាពអង្គការសង្គមស៊ីវិលទាំងនេះ ត្រូវបានលោក កុយ គួង អ្នកនាំពាក្យក្រសួងការបរទេសកម្ពុជាបដិសេធមិនធ្វើអត្ថាធិប្បាយ ពីព្រោះលោកមិនទាន់បានទទួលការអនុញ្ញាតពីថ្នាក់លើ ។ ប៉ុន្តែជាមួយគ្នានេះដែរ លោក កុយ គួង ក៏បានបញ្ជាក់ថា ការបង្កើតអង្គការសិទ្ធិមនុស្សអាស៊ាន គឺជាចំណុចល្អសំរាប់ប្រទេសក្នុងតំបន់អាស៊ានឱ្យកាន់តែល្អប្រសើរថែមទៀតផង ។

គួរបញ្ជាក់ថា ស្ថានភាពសិទ្ធិមនុស្សនៅ

(តទៅទំព័រទី១៩)

# ទាហានសៀមលុកលុយចូលទឹកដីឧត្តរមានជ័យព្រំដែនកម្ពុជា_សៀម

ឧត្តរមានជ័យ, ខ្មែរប៉ុស្តិ៍ : ឃុត សីហា

●●●ទោះបីជាមានការជួបពិភាក្សាគ្នាម្តងហើយម្តងទៀតរវាងក្រសួងការបរទេសកម្ពុជា-សៀម និងនាយករដ្ឋមន្ត្រីនៃប្រទេសទាំងពីរយ៉ាងណាក្តីក៏ដំណោះស្រាយព្រំដែនដែលជាប់គាំងអស់រយៈពេលជាង៨ខែនៅតែដដែល ។ ជាពិសេសនោះ ពួកទាហានសៀមបានធ្វើសកម្មភាពលុកលុយឈ្លានពានចូលទឹកដីកម្ពុជានៅតាមជាយដែនក្នុងភូមិសាស្ត្រខេត្តព្រះវិហារ និងឧត្តរ-មានជ័យ ជាបន្តបន្ទាប់ ដោយគ្មានកោតញញើតបន្តិចសោះឡើយ ។

ជាក់ស្តែងកាលពីដើមខែមីនានេះ ទាហានឈុតខ្មៅសៀមបាននាំគ្នាចូលមកបោះតង់ ជីកលេណដ្ឋាន ដាក់ប៉ុស្តិ៍យាមនៅក្បែរច្រកព្រំដែនជាំស្រងាំ ខេត្តឧត្តរមានជ័យ ដែលចូលមកក្នុងទឹកដីកម្ពុជាជាង100ម៉ែត្រ ។ ចំណែកទាហានកម្ពុជាហាក់ដូចជាគ្មានមធ្យោបាយទប់ស្កាត់បន្តិច ទាល់តែសោះ ដែលការលុកលុយនេះគឺជាការប្រមាថលើជាតិសាសន៍ខ្មែរធ្ងន់ធ្ងរខ្លាំងណាស់ក្នុងនាមប្រទេសជិតខាងនោះ ។


ទាហាននៅតាមព្រំដែនខេត្តឧត្តរមានជ័យ កំពុងការពារទឹកដី

លោក តូច វ៉ា មន្ត្រីទំនាក់ទំនងព្រំដែនកម្ពុជា-សៀម បានឱ្យដឹងថា ទាហានឈុតខ្មៅសៀមបានមកចំណុចក្បែរច្រកជាំស្រងាំក្នុងទឹកដីខ្មែរ ដោយជីកលេណដ្ឋាន ធ្វើប៉ុស្តិ៍យាមតាមទំនើងចិត្តគ្មានសួរនាំខាងភាគីកម្ពុជាបន្តិច សោះ ។

លោក តូច វ៉ា បន្តថា ប៉ុន្តែក្រោយពីធ្វើការចរចាពីថ្នាក់ដឹកនាំមួយសន្ទុះ ក្រោយមកពួកទាហានឈុតខ្មៅក៏យល់ព្រមដកថយទៅវិញ ទាំងទើសទល់ និងបញ្ចេញនូវសកម្មភាពមិនសមរម្យមួយចំនួនថែមទៀត ។

ទាក់ទិនទៅនឹងសកម្មភាពខាងលើនេះ លោក វ៉ា គីមហុង ប្រ-ធានគណៈកម្មាធិការព្រំដែនកម្ពុជា បានបញ្ជាក់ថា ពួកទាហានសៀមមិនត្រូវធ្វើអ្វីស្រេចតែអំពើចិត្តទេ ពីព្រោះពួកគេមានប៉ុស្តិ៍យាមនៅតាមប្រទល់បានកំណត់រួចហើយ មិនមកធ្វើបែបនេះទៀតទេ ។ បញ្ហានេះ ទាហានខ្មែរដែលឈរជើងនៅក្បែរនោះគួរតែដោះស្រាយ និងរារាំងកុំឱ្យកើតមានបន្តទៀត ។


ទាហានសៀមចូលលុកលុយទឹកដីខ្មែរ

បើយោងតាមមន្ត្រីនៅព្រំដែនបានឱ្យដឹងថា ការរំលោភចូលព្រំ-ដែនរបស់ពួកសៀមមកលើទឹកដីកម្ពុជាបានកើតមានជាបន្តបន្ទាប់ ដោយទាហានកម្ពុជាបានចាប់ខ្លួនទាហានសៀមដែលចូលមកចំណុចចំការចេកតាម៉ុក និងមានអោបគ្រាប់បែកមកជាមួយទៀតផង ។ នៅថ្ងៃទី26 ខែ កុម្ភៈ ទាហានខ្មែរបានចាប់ខ្លួនទាហានសៀម ដែលចូលមកទឹកដីខ្មែរនៅចំណុចតាទុំ និងថ្ងៃទី17 ខែកុម្ភៈ សៀមបានបាញ់កាំភ្លើងធំចូលទឹកដីកម្ពុជាជាច្រើនគ្រាប់ក្បែរប្រាសាទតាក្របី ស្រុកបន្ទាយអំពិលខេត្តឧត្តរ-មានជ័យ ។

ការរំលោភបំពានពីសំណាក់ទាហានសៀមយ៉ាងកំរោលមកលើទឹកដីកម្ពុជានេះ ក៏ដោយសារតែពួកវាមើលឃើញជំហរទន់ជ្រាយរបស់អ្នកដឹកនាំខ្មែរមិនច្បាស់លាស់ក្នុងរឿងដោះស្រាយ

( តទៅទំព័រទី១៩ )




## ទំព័រហ្វីឡាដែលហ្វីយ៉ា

# ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**ដោយ : ពិនសំខុន** ***តពីលេខមុន***

**២១ ធ្នូ ឆ្នាំ ១៩៦៥**

រដ្ឋាភិបាលអាមេរិកាំង បានចោទប្រកាន់កម្ពុជា ថាបានផ្តល់ជម្រកការអនុញ្ញាតិឱ្យវាយប្រហារលើទឹកដីកម្ពុជាបាន ។

**ឆ្នាំ ១៩៦៦**

យៀកណាមខាងជើង បានបង្កើតកងឯកភាពពិសេសមួយឈ្មោះ P36 សម្រាប់បង្រៀនកងទ័ពកុម្មុយនិស្តខ្មែរ កងឯកភាពពិសេសនោះដឹកនាំដោយ ឡេ ឌិតថូ ។

**១៤ មករា :** ទ្រង់ ឥរិន្ទ ដេត ក្នុងនាមនៃសម្តេចនរោត្តម សីហនុ បានថ្កោលទោសការទម្លាក់គ្រាប់បែកលើដែនដីកម្ពុជា ដែលបានធ្វើឱ្យមានការបាត់បង់ជីវិតខ្មែរច្រើនរយនាក់ ។

**៥ កុម្ភៈ :** ការិយាល័យអង្គការអាមេរិកាំងមួយឈ្មោះ " មូលនិធិអាស៊ី " ដែលធ្លាប់មានឈ្មោះបំរើ CIA បានត្រូវបិទទ្វារ ។

**១៩ មីនា :** កម្ពុជាចាប់ផ្តើមទទួលអំណោយពីសហភាពសូវៀត ។

**៣ មេសា :** កងទ័ពថៃបានចូលមកកាន់កាប់ប្រាសាទព្រះវិហារ តែត្រូវបានកម្ពុជា យកវិញនៅថ្ងៃទី ៦ មេសា ។

**១២ មិថុនា :** រថភ្លើងដឹកអ្នកដំណើរ បានទទួលការវាយប្រហារនៅលើផ្លូវបាត់ដំបងប៉ោយប៉ែត គេដឹងថា ការវាយប្រហារនេះជាស្នាដៃរបស់ពួកខ្មែរកុម្មុយនិស្ត ដឹកនាំដោយ មូល សម្បត្តិ ។

**៣២ កក្កដា ដល់ ៣ សីហា :** យន្តហោះកងទ័ពរបស់អាមេរិកាំង បានវាយប្រហារលើភូមិធិកថាច់ នៅចំពេលដែលអង្គការត្រួតពិនិត្យអន្តរជាតិ CIC នៅទីនោះ ។

**ខែ សីហា :** កិច្ចចរចាខ្មែរ-យៀកណាមខាងជើង និងរណសិរ្សរំដោះយៀកណាមខាងត្បូង ស្តីអំពីការកំណត់ព្រំប្រទល់ដែន តែកិច្ចចរចានេះត្រូវបរាជ័យ ។

**១០ សីហា :** យោធាសហរដ្ឋអាមេរិក បានសំដែងការសោកស្តាយចំពោះពលរដ្ឋខ្មែរ រងគ្រោះដោយការទម្លាក់គ្រាប់បែកតាមយន្តហោះ ហើយបានពន្យល់ថា " ភូមិដែលទទួលការទម្លាក់គ្រាប់បែកនោះ ពុំមែននៅលើទឹកដីកម្ពុជាទេ បើតាមផែនទីរបស់កងទ័ពអាកាសរបស់អាមេរិកាំង ។

**ថ្ងៃ ១៣ សីហា :** នរោត្តម សីហនុ បានលប់ចោលទស្សនៈកិច្ចរបស់លោក AVEREL HAR- RIMAN អាវើល ហារម៉ាន់ ដោយសារសេចក្តីថ្លែងការណ៍ថា " ភូមិ ធិកថាច់ ពុំស្ថិតនៅក្នុងទឹកដីកម្ពុជា គឺបានន័យថា អាមេរិកាំងមានឆន្ទៈនឹងបោចយកដែនដីឱ្យឃ្លាតចេញពីកម្ពុជា " ។

**ខែកញ្ញា :** សាឡុតស និងគណប្រតិភូ បានត្រឡប់មកដល់ការិយាល័យ១០០វិញ ហើយធ្វើសេចក្តីប្រកាសធំ១២យ៉ាងធំ ទី១. ការបន្ថយឥទ្ធិពលពីឈ្មោះបក្សកុម្មុយនិស្តឥណ្ឌូចិន ឱ្យមកជាឈ្មោះ កប្បកុម្មុយនិស្តខ្មែរទីមួយ។. ទី២. បង្កើនសមត្ថភាពសង្គ្រាម ហើយប្តូរទីបញ្ជាការពីការិយាល័យ១០០ ទៅតំបន់ខាងជើងឈាងខាងកើតនៃខេត្តរតនគិរីវិញ ។

**១ កញ្ញា :** សន្ទរកថា ឧត្តមសេនីយ៍ ដឺ ហ្គោល ប្រធានាធិបតេយ្យបារាំង នៅទីក្រុងភ្នំពេញ ។

**១១ កញ្ញា :** បោះឆ្នោតជ្រើសរើសតំណាងរាស្ត្រ នេះជាលើកដំបូងហើយ ដែលអាសនៈចំនួន ៨២ ត្រូវបានបេក្ខជនដ៏ច្រើន រហូតដល់បេក្ខជន ៤១៥នាក់ ដណ្តើមគ្នា នៅក្រោមទង់ជាតិនៃចលនាតែមួយ គឺសង្គមរាស្ត្រនិយម ប៉ុន្តែមានចរន្តគ្រប់គ្រងបែបកុម្មុយនិស្ត បែបលោកសេរី និងបែបសីហនុនិយម នៅចំរុះគ្នា ។ បើទោះបីជាមានការឃោសនាប្រឆាំងយ៉ាងហិង្សាលើចលនាកុម្មុយនិស្តក្តី ខៀវ សំផន, ហ៊ូ យន់, ហ៊ូ នឹម បានជាប់ឆ្នោតសាជាថ្មីម្តងទៀត រីឯចលនាស្តាំនិយមមានជ័យជំនះច្រើនដាច់ខាតរាស្ត្រចំនួន ៦៥៥% នៃចំនួនអ្នកចុះឈ្មោះ បានចេញមកបោះឆ្នោត ។

**១៧ កញ្ញា :** ការចរចាគ្នាជាមួយក្រុមកុម្មុយ-និស្តវៀតណាម ស្តីពីការកំណត់ព្រំព្រទល់ដែនត្រូវបានបញ្ចប់ដោយគ្មានកិច្ចព្រមព្រៀងទេ ។

**២៥ តុលា :** លោក លន់ ណុល ត្រូវបានតែងតាំងជានាយរដ្ឋមន្ត្រី នៃចលនាសង្គមរាស្ត្រនិយមទី២២ :

**២៦ តុលា :** សីហនុ បង្កើនអង្គការថ្មីមួយទៀត ។

**១៧ វិច្ឆិកា :** សម្ពោធស្ពានថ្មីមុនីវង្សជំនួសស្ពានចាស់ ដែលសង់ដោយ Gustave Eiffol ឆ្នាំ ១៩២៨ ហើយត្រូវរលំឆ្នាំ ១៩៦៤។

**១៨ វិច្ឆិកា :** ពាក្យ " ខ្មែរក្រហម " សំដៅទៅលើចលនាកុម្មុយនិស្តខ្មែរ ត្រូវបានសម្តេចសីហនុ បង្កើតជាលើកដំបូង ។

**២២ វិច្ឆិកា :** សម្តេច សីហនុ បានលើករឿងខិត្តប័ណ្ណ " ក្រុមខ្មែរក្រហម " ដែលវាយប្រហារព្រះអង្គដោយផ្ទាល់ ។

**ឆ្នាំ ១៩៦៧**

**៦ មករា :** សម្តេច សីហនុ យាងចេញទៅប្រទេសបារាំងចំនួនពីរខែ លោក លន់ ណុល បានបង្កើនយន្តការណ៍ប្រមូលស្រូវ ។ នៅពេលប្រមូល ស្រូវមានសេចក្តីរាយការណ៍ពីការប្រើអំពើហិង្សារហូតដល់សម្លាប់រាស្ត្រ ។ នៅពេលប្រើយន្តការណ៍នោះ លន់ ណុល បានទៅប្រចាំការនៅបាត់ដំបង តំបន់ដែលលោកធ្លាប់ជាចៅហ្វាយខេត្ត ពីឆ្នាំ ១៩៤៦ ដល់ ១៩៥៣ ។

(នៅមានត)

# ពុទ្ធប្បវត្តិអមដោយរូបភាព
## A Pictorrial Biography of Saky amuni Buddha

**ដោយ : អ៊ុម ឈឿម**
**(តពីលេខមុន)**



❖រូបភាព និងរឿងដើមជាភាសាថៃដោយ គុណាប៉ាយុតា
❖បកប្រែជាភាសាចិន ដោយ ភិក្ខុ ជែន ហាយ
❖បកប្រែជាភាសាអង់គ្លេស ដោយ ហ្សិត .អេ.លី
❖ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី
❖បកប្រែជាភាសាខ្មែរ ដោយភិក្ខុ គង់ អាំ

❖Original Illuatration and Naration in Thai by Gunapayuta.
❖Translation into Chinese by Bhikkhu Jan Hai.
❖Translation into English by Z.A Lu.
❖ Coloring by Yann-Fang Lee
❖Translation into Khmer by Bhikkhu Kong Am.

១៧-ទោះបីព្រះសិទ្ធត្ថជាសិស្សដ៏ឆ្លាតវាងវៃបែបហ្នឹងក៏ដោយ សូម្បីនៅពេលដែលនឹងឡើងសោយរាជជាអ្នកស្នងរាជសម្បត្តិ ក៏ព្រះអង្គទ្រង់តែងយកព្រះទ័យទុកដាក់គោរពប្រណិបត្តិចំពោះគ្រូទាំងនោះដ៏សមគួរ ។ ព្រោះព្រះអង្គទ្រង់យល់ឃើញថា មានតែការបង្រៀនប្រៀនប្រដៅពីសំណាក់គ្រូអាចារ្យទាំងឡាយទេ ដែលធ្វើឱ្យមនុស្សយើងបានទទួលនូវចំណេះវិជ្ជាដ៏មានក្រៃលែងនោះបាន ។ ម្យ៉ាងទៀត ចរិកធម្មជាតិរបស់ព្រះអង្គ គឺថាព្រះអង្គតែងទ្រង់ប្រព្រឹត្តនូវភាពរួសរាយរាក់ទាក់ និងសុភាពរាបសារស្មើៗគ្នាចំពោះមនុស្សទូទៅទាំងអស់។



17- Even though Prince Siddhartha was such a clever pulil, at the same time the crown prince, the heir to the throne, he never neglected to treat his teachers with manners and all durrespect. For the prince believed that only through the instruction from teachers could men acquire knowledge fo very great value. Besides, the nature of the prince was such that he treaded everyone with equal geniality and politeness.

១៨-ថ្វីព្រះហស្តក្នុងមុខជំនាញខាងកំលាំងកាយរបស់ព្រះសុទ្ធត្ថក៏មិនចាញ់គ្នានឹងគុណធម៌របស់ព្រះអង្គដែរ។ ក្រៅពីភាពរួសរាយ និងសុភាពរាបសារព្រះរាជកុមារទ្រង់ក៏មានភាពអង់អាចក្លាហានណាស់ដែរ។ ព្រះអង្គមិនដែលខ្លាចញញើត ឬអល់អែកក្នុងព្រះទ័យម្តងណាឡើយ នៅពេលប្រកួតប្រជែងជាមួយកុមារផងទាំងឡាយទៀត ក្នុងជំនាញផ្សេងៗ។ ក្នុងកំឡុងពេលនោះដែរ រាជកុមារទាំងឡាយនៃក្រុមព្រះរាជវង្សត្រូវបាន ហ្វឹកហាត់ដើម្បីធ្វើជាមន្ត្រីក្លាហាន ។ ព្រះរាជកុមារតាំងពីនៅក្មេងទ្រង់បានហ្វឹក ដើម្បីក្លាយជាមន្ត្រីដ៏អង់អាចក្លាហាននឹងស្លូតបូតម្នាក់ ហើយព្រះអង្គជិះសេះបានយ៉ាងស្ទាត់ជំនាញបំផុតទៀតផង ។



18- Prince Siddhartha's accomplishment in physical skill was no less than his virtue in conduct and deportment. Besides being genial and polite, the prince was also very courageous. He never feared or hesitated when competing with other boys in various skills. During that time, all males of the royal rtibe were educated to become gallant knights. The prince, since his early youth, had been trained to be a kind and brave knight, and he was also able to drive a chariot very skillfully.

១៩-ក្នុងព្រះនគរមានប្រណាំងសេះមួយ ដែលព្រះអង្គទ្រង់ជាអ្នកបានទទួលជោគជ័យជំនះលើគូរប្រកួតដ៏ស្វិតស្វាញ ។ ទោះបីជាការប្រកួតប្រជែងតម្រូវឱ្យបេក្ខជនទាំងអស់ប្រឹងប្រែងតស៊ូអស់ពីសមត្ថភាពដើម្បីដណ្តើមជោគជ័យក៏ដោយ ក៏ព្រះរាជកុមារនៅតែបំបោលសេះយ៉ាងថ្នមៗ ។ ចំណែកឯសេះវិញ ខំប្រឹងបញ្ចេញកំលាំងដ៏ពេញទំហឹងរបស់ខ្លួនផងដែរ ហើយជាមួយកំលាំងដ៏ក្លាហាននេះ បានជួយឱ្យព្រះអង្គទ្រង់បានជាអ្នកទទួលជ័យជំនះ ។ ដោយឡែកសេះវិញ ក៏បានដឹងរួចជាមុនហើយថា រាជកុមារជាម្ចាស់នឹងប្រាកដជាអ្នកឈ្នះមិនមែនជាអ្នកចាញ់ឡើយ ។

(នៅមានត)

19- There was a chariot race, which the prince had won againt the toughest rival in the country. Although a competition of this sort reqwuired that the participants struggle very hard for victory, the price treated his horse gently. The horse, in return, also exerded its full strength and with all its might helped the prince to become the victor. For the horse, too, felt that the prince should be only a winner, hot a loser.



(continue Issue After)




# អាហារ និង ការថែទាំអ្នកជំងឺទឹកនោមផ្អែម

**●អ្នកកើតជម្ងឺទឹកនោមផ្អែម គួរទទួលទានអាហារប៉ុន្មានពេល ?**

អ្នកជម្ងឺទឹកនោមផ្អែមខ្លះយល់ខុសថា ការទទួលទានអាហារត្រឹមតែ១ ឬ២ពេលនឹងធ្វើឱ្យកម្រិតជាតិស្ករចុះថយ ។ ប៉ុន្តែតាមការពិតប្រការ ប្រតិបត្តិដ៏ត្រឹមត្រូវ គឺទទួលទានអាហារឱ្យគ្រប់ទាំង៣ពេល គឺព្រឹក ថ្ងៃត្រង់ ល្ងាច និងទទួលទាននៅពេលដល់ពេលទទួលទាន មិនមែននៅពេលឃ្លានទេ ព្រោះបើឃ្លានធ្វើឱ្យអ្នកទទួលទានច្រើន ។ មិនគួរផ្អាកទទួលទានអាហារពេលណាមួយទេ ។

អ្នកជម្ងឺទឹកនោមផ្អែមខ្លះដែលត្រូវចាក់ អ៊ីនស៊ូលីន (Insulin) ឬ មានប្រវត្តិជាតិស្ករ ក្នុងឈាមទាបជាញឹកញាប់ អាចចាំបាច់ត្រូវទទួលទានអាហារច្រើនជាង៣ពេលទៅជា ៤-៦ ពេល ឬទទួលទានអាហារបន្ថែមនៅពេលរសៀល ឬមុនពេលគេងដោយអាហារបន្ថែមនេះអាចជាទឹកដោះគោសាប១កែវ នំប៉័ងសាប២បន្ទះ។ ប៉ុន្តែនៅពេលទទួលទានអាហារក្រៅផ្ទះ អ្នកជម្ងឺទឹកនោមផ្អែមគួរស្វែងយល់ពីវិធីសាស្ត្រជ្រើសរើសអាហារដែលសមស្រប សម្រាប់ការគ្រប់គ្រងកម្រិតស្ករក្នុងឈាម ដោយចាប់ផ្តើមពីការជ្រើសរើសហាង ឬភោជនីយដ្ឋានដែលអាចកុម្ម៉ង់អាហារតាមតម្រូវការបានដូចជាមិនដាក់ ប៊ីចេង, ស្ករ, អំបិល ជាដើម ។

**●អាហារសម្រាប់អ្នកជម្ងឺទឹកនោមផ្អែម**

**ប្រភេទម្សៅ** : ដូចជាបាយ គុយទាវ ត្រូវកាត់បន្ថយមួយភាគបីពីការដែលធ្លាប់ទទួលទានពីមុនមក ។

**សាច់សត្វ** : ដែលឆ្អិនស្រាប់ ហើយត្រូវបកស្បែកចេញជាមុនឱ្យនៅសល់ជាតិខ្លាញ់តិចបំផុត ។

**បន្លែ** : ពពួកស្លឹក និងមែកធាងអាចទទួលទានបាន ។ ចំពោះផ្លែ ឈើគួរជ្រើសរើសទទួលទានប្រភេទដែលមិនមានរសជាតិផ្អែមខ្លាំង ប៉ុន្តែទទួលទានម្តងបានប្រមាណ៦-៨ ម៉ាត់ប៉ុណ្ណោះ ។

**ទឹក** : ទឹកសាបអាចពិសាបាន គួរឈប់ទទួលទានភេសជ្ជៈប្រភេទ ដែលមានជាតិ អាល់កុល (គ្រឿងស្រវឹង) ។

**●អាហារដែលគួរចៀសវាង**

អាហារដែលមានរសជាតិប្រៃខ្លាំង អាហារឆ្អិនស្រាប់ និងអាហារប្រភេទត្រាំផ្អាប់ ប្លុករួមទាំងកាត់បន្ថយបរិមាណប្រើប្រាស់អំបិលក្នុងចំណីអាហារផង។

ចំណីអាហារដែលមានរសជាតិផ្អែម ដូចជានំផ្អែម ទឹកក្រូច (ច្រកកំប៉ុង-ដប) ដំណាប់ចាហួយ ស្ករគ្រាប់សូកូឡា ផ្លែឈើត្រាំ ឆឹង និងទឹកដោះគោខាប់ផ្អែម ។ ប៉ុន្តែ បើចូលចិត្តផ្អែម សូមប្រើស្ករសម្រាប់អ្នកជម្ងឺទឹកនោមផ្អែម ។

ភេសជ្ជៈ ទឹកផ្អែមផ្សេងៗបាន ដល់ទឹកសេរ៉ូផ្អែមខាប់ ទឹកក្រូច ទឹកផ្លែឈើ និងភេសជ្ជៈកំប៉ុងផ្សំពីស្ករ និងគ្រឿងស្រវឹងដូចជាស្រា.... ។

**●ការថែរក្សា**

ក្នុងការប៉ះទង្គិចជាញឹកញាប់របស់អ្នក កើតជម្ងឺទឹកនោមផ្អែម គេច្រើនប្រទះឃើញ ដំបៅនៅក្រោមបាតជើង ដោយសារតែកម្រិតទទួលអារម្មណ៍នៃប្រព័ន្ធប្រសាទជើងថយចុះ និងភាគច្រើនកើតពីការប្រើប្រាស់ស្បែកជើង ពុំបានត្រឹមត្រូវ ។ ក្រៅពីនេះការមានស្នាមរបួសបន្តិចបន្តួចក៏អាចឆ្លងមេរោគ និងដោយសារអាការជម្ងឺធ្វើឱ្យដំបៅរីកធំរហូតដល់ថ្នាក់ធ្ងន់ធ្ងរអាចត្រូវកាត់ជើង ឬដល់បាត់បង់ជីវិតផង ។ ខាងក្រោមនេះគឺជាវិធី៥យ៉ាងសម្រាប់ ថែទាំជើងចំពោះអ្នកកើតជម្ងឺទឹកនោមផ្អែម ៖



**១**-លាងសម្អាតជើងរាល់ថ្ងៃដោយទឹក និងសាប៊ូប្រភេទខ្សោយៗ ។ ត្រូវដុសដោយក្រណាត់ ឬច្រាសប្រភេទទន់ហើយថ្នមៗ ។ បន្ទាប់ពីធ្វើការសម្អាតត្រូវជូតជើងឱ្យស្ងួតដោយក្រណាត់ស្អាតល្អ និងទន់ដូចជាកន្សែងពោះគោ ជាពិសេសត្រង់បរិវេណចន្លោះចង្កេះជើង ។

**២**-ត្រួតពិនិត្យជើងដោយខ្លួនឯងរាល់ថ្ងៃ ។ ត្រូវមើលឱ្យដឹងជាក់ថា មានអាការហើម អាការក្រហមរលាក ក្លាយមានគ្រាប់ពងស្នាមជាំ ស្បែកផ្លាស់ប្តូរពណ៌ឈឺចុកចាប់ ស្ពឹកស្រពន់ ឬមានអារម្មណ៍ខុសពីប្រក្រតី នៅត្រង់ផ្នែកណាមួយរបស់ប្រអប់ជើង ។ បើមានអាការខុសប្លែកពីធម្មតា គួរទៅពិភាក្សាជាមួយពេទ្យភ្លាម ។

**៣**-ពាក់ស្បែកជើង ឬស្បែកជើងផ្ទាត់គ្រប់ពេលវេលាទាំង នៅក្នុងផ្ទះ និងក្រៅផ្ទះ គួររកស្បែកជើងមកពាក់ឱ្យបានជាប់ជាប្រចាំដើម្បីការពារមិនឱ្យកើតមានដំបៅ ទោះបីជាដំបៅខ្លះតូចៗដូចជាដាច់រលាត់ ព្រោះត្រូវប៉ះទង្គិច វត្ថុរឹងក៏អាចកើតស្នាមដំបៅ និងមិនងាយជា សះដោយសារតែខ្វះឈាមមកចិញ្ចឹមបីបាច់ ។

**៤**-ត្រួតពិនិត្យផ្នែកខាងក្នុងស្បែកជើងរាល់ថ្ងៃ ។ ត្រូវចៀសវាងមិនឱ្យមានកំទេចកំទី ឬមុតអ្វីចូលក្នុងស្បែកជើង ដាច់ខាតដូចជា ក្រួស ខ្សាច់ អំបែងកែវ ។ល។ ព្រោះអាចធ្វើ ឱ្យកើតដំបៅមើលមិនជា ។

**៥**-កាត់ក្រចកជើងត្រូវប្រយ័ត្ន ។ បើភ្នែកមិនសូវច្បាស់ គួររកក្រុមគ្រួសារកាត់ឱ្យ មិនត្រូវឱ្យខ្លីខ្លាំងពេក ឬដាច់រលាត់ស្បែក ត្រូវកាត់បែបធម្មតាមិនឱ្យកោង ឬក្បាច់ក្បូរច្រើន ។

បើសិនជួបបញ្ហាសុខភាពជើង មិនគួររារែកចិត្ត ត្រូវប្រញាប់ទៅជួបគ្រូពេទ្យ ព្រោះក្នុងករណីខ្លះអាចធ្ងន់ធ្ងរ និងរីករាលដាលជាដំបៅត្រូវប្រើពេលព្យាបាលយូរខែចំណាយប្រាក់កាសច្រើន ៕

## សោភណភាព

❖ក្នុងមួយថ្ងៃស្ត្រីយុគសម័យថ្មីត្រូវប្រឈមមុខនឹងបរិស្ថានកខ្វក់ជាច្រើន ជាពិសេសគឺស្បែកដៃដែលងាយរងផលប៉ះពាល់ជាងគេ មិនថាជាការចាប់វត្ថុឧបករណ៍ប្រើប្រាស់ប្រចាំថ្ងៃ រួមទាំងការសម្អាតរបស់ប្រើប្រាស់ក្នុងបន្ទប់បាយ ជាហេតុធ្វើឱ្យដៃរបស់អ្នកត្រូវរឹងក្រិនគ្រោះខ្វះភាពទន់រលោងស្អាតគួរឱ្យចង់ប៉ះ ។ ប៉ុន្តែពេលនេះ អ្នកពុំចាំបាច់ពិបាកចិត្តពី បញ្ហានេះ ទៀតទេ ដោយគ្រាន់តែអ្នកសាកល្បងអនុវត្តតាមការណែនាំខាងក្រោមនេះ...។

### អាថ៌កំបាំង ដើម្បីដៃទន់ស្អាតតាមធម្មជាតិ

♦**ទឹកដោះគោជូរ ឬទឹកដោះគោឆៅ** : មានភាពជាអាស៊ីដខ្សោយ ដែលជួយកម្ចាត់កោសិកាស្បែកចាស់ចេញធ្វើឱ្យស្បែករលោង ជាពិសេសទឹកដោះគោជូរមានប្រូតេអ៊ីននោះ ប្រៀបដូចជាជីវជាតិអាហារជួយបំប៉នស្បែកអញ្ចឹង ។

♦**ពោត** : ដោយក្លិនក្រអូបខ្សោយៗ ជួយឱ្យអ្នកមានអារម្មណ៍ធូរស្បើយធ្វើឱ្យរាងកាយអាចស្តារកោសិកាស្បែកដែលទ្រុឌទ្រោមបានយ៉ាងពេញទំហឹង ជាពិសេសវាអាចជួយកម្ចាត់សារធាតុពិសពុល ដែលមាននៅក្នុងរាងកាយទៀតផង ។

♦**ត្រសក់** :សម្បូរទៅដោយវីតាមីន C និងបេតា-ខារ៉ូទីន (Beta Carotine) មានប្រសិទ្ធភាពប្រឆាំងនឹងពួករ៉ាឌីកាល់សេរីបន្ថែមសំណើមដល់ស្បែក និងជួយកម្ចាត់មេរោគ ធ្វើឱ្យស្បែកដៃរបស់យើងស្អាតស្រស់ថ្លាឡើង ។ ក្រៅពីនេះសារធាតុសម្រាប់សម្អាតផ្សេងៗដែលមានជាតិពុលបានខ្ពស់ មិនថាសាប៊ូហ្មលាងមុខ ឬសូម្បីតែរបស់ប្រើប្រាស់ក្នុងបន្ទប់បាយ ដូចជាទឹកថ្នាំលាងចាន ដែលប្រើសម្រាប់កម្ចាត់ជាតិក្អែល ខ្លាញ់ ដែលប្រឡាក់ឱ្យអស់នោះ ក៏អាចធ្វើឱ្យស្បែកដៃរបស់អ្នកស្ងួតក្រិនគ្រោះបានដោយចៀសពុំរួច ៕

## (តមកទៅទំព័រទី១៧) ឡុងប៊ិច : ប៉ូលិសដាក់បំរាមក្រុម...

ទិត ស៊ីផាន់ នាយកគណៈកម្មការវត្តចាស់ ដោយបំរាមនោះបាន ហាមក្រុមមនុស្សរបស់លោក ទិត ស៊ីផាន់ កុំឱ្យប៉ះពាល់ទ្រព្យសម្បត្តិ ឬធ្វើសកម្មភាពអ្វីដែលខុសច្បាប់ផ្ទុយពីបទបញ្ជាតុលាការ (Court Order) ដែលបានបង្គាប់នូវការងារឱ្យក្រុមគណៈកម្មការចាស់ប្រគល់ទ្រព្យសម្បត្តិក្រោមស្លាក ជារបស់វត្តខ្មែរវិបស្សនារាម (WKV) ឱ្យទៅពុទ្ធិកសមាគមខ្មែរ (KBA) វិញ កាលពីថ្ងៃទី20 ខែកុម្ភៈ ឆ្នាំ 2009 ។




ការបំរាមរបស់ប៉ូលិសត្រូវបានធ្វើឡើង ស្របគ្នាក្នុងថ្ងៃដែលគណៈកម្មការថ្មីដែលទើបបោះឆ្នោតក្រោមការទទួលស្គាល់ពីតុលាការកំពូល រដ្ឋ California កាលពីខែមករា ឆ្នាំ 2009 នេះ បានរុះរើជញ្ជាំងផ្ទះ ( កុដិ) ដែល ក្រុមលោក ទិត ស៊ីផាន់ អះអាងថា ជាវត្តខ្មែរ វិបស្សនារាម មិនមែនជារបស់ពុទ្ធិកសមាគមខ្មែរវត្ត IRAP ទៀតទេ ។

ការរុះរើវាយទម្លុះជញ្ជាំងកុដិជាប់គ្នានិងសាលាឆាន់ ឬព្រះវិហារផងនោះ បានធ្វើឱ្យក្រុមទាំងពីរមានការប៉ះពាល់សំដីគ្នារហូតដល់មានការមកជួយអន្តរាគមន៍ពីសំណាក់ក្រុមប៉ូលិស កាលពីថ្ងៃទី16 ខែមីនា ឆ្នាំ 2009 ។

ក្រុមលោក ទិត ស៊ីផាន់ ឈ្មោះ ហៃ អ៊ុន និយាយប្រាប់ខ្មែរប៉ុស្តិ៍ឱ្យដឹងថា តុលាការបានដាក់បទបញ្ជាខុសច្បាប់រំលោភបំពានមកលើក្រុមពួកយើងដែលមិនបានធ្វើអ្វីខុសច្បាប់សោះ ព្រោះកុដិមួយនេះវាជាទ្រព្យសម្បត្តិរបស់វត្តខ្មែរវិបស្សនា-រាម មិនមែនជារបស់ពុទ្ធិកសមាគមខ្មែរវត្ត IRAP ទៀតទេ ។

ចំណែកលោក វីល្លឹម ថាច់ គូកនរបស់ ទិត ស៊ីផាន់ ដែរនោះបានអះអាងទៅចំពោះអ្នកកាសែតខ្មែរប៉ុស្តិ៍យើងឱ្យដឹងថា មនុស្សល្អធ្វើត្រូវច្បាប់ ស្រាប់តែប្រែទៅជាអាក្រក់ ខុសឆ្គងទៅវិញ វាដូចជាអយុត្តិធមិណាស់ ទង្វើដែលធ្វើមកលើក្រុមរបស់ពួកគាត់ ។

នាយកគណៈកម្មការថ្មីដែលកំពុងចាត់ចែងការងារវត្ត IRAP លោក ប្រាយអ៊ិន បែន ប្រាប់ខ្មែរប៉ុស្តិ៍ឱ្យដឹងថា គណៈកម្មការវត្តរបស់យើងធ្វើអ្វីទៅតាមផ្លូវច្បាប់ ទៅតាមបញ្ជាតុលាការតែប៉ុណ្ណោះ ។ ហើយការអះអាងរបស់អ្នកទាំងនោះថាមិនត្រឹមត្រូវតុលាការអយុត្តិធមិ ទ្រព្យសម្បត្តិវត្តជារបស់ពួកគេ វាជារឿងការនិយាយរបស់ពួកគេដែលយើងមិនអាចហាមឃាត់សិទ្ធិក្នុងការនិយាយស្តីរបស់ពួកគេបានឡើយ ។

មន្ត្រីប៉ូលិសអ្នកស្រី L.A Soto និយាយប្រាប់លោក ទិត ស៊ីផាន់ នៅចំពោះមុខអ្នកកាសែតខ្មែរប៉ុស្តិ៍ឱ្យដឹងថា "លោកត្រូវគោរពតាមបទបញ្ជារបស់តុលាការដែលគ្មាននរណាម្នាក់អាចរំលោភបាន ដោយហាមប៉ះពាល់ទ្រព្យសម្បត្តិវត្ត ឬធ្វើអ្វីខុសច្បាប់ ដោយអ្នកស្រីបានពន្យល់លើកពីច្បាប់គ្រប់គ្រងអចលនទ្រព្យ និងបទបញ្ជាតុលាការ (Court Order) ។

កុដិមួយខ្នងដែលកំពុងបានរុះរើ និងរៀបចំជាថ្មី ដែលក្រុម ទិត ស៊ីផាន់ អះអាងថា ជាទ្រព្យសម្បត្តិវត្តខ្មែរវិបស្សនារាម មានព្រះសង្ឃគង់នៅមួយអង្គព្រះនាម សាន សូធី បានត្រូវក្រុម ទិត ស៊ីផាន់ នាំយកទៅគង់នៅផ្ទះពុទ្ធបរិស័ទក្រៅវត្តបាត់ទៅហើយ តាំងពីថ្ងៃមានជម្លោះគ្នានោះមក ។ បើទោះបីក្រុមចាស់ទុំ និងព្រះសង្ឃនៅក្នុងវត្ត IRAP បានទៅនិមន្តឱ្យទៅគង់នៅកុដិផ្សេង ដើម្បីយកកុដិនេះ រៀបចំជាសាលាឆាន់ ឬព្រះវិហារឱ្យធំទូលាយយ៉ាងណាក៏ដោយ ប៉ុន្តែព្រះសង្ឃអង្គព្រះនាម សាន សូធី មិនយល់ព្រមឡើយ ។

ជម្លោះវត្ត IRAP បានប្តឹងប្តល់គ្នាជាងមួយឆ្នាំរហូតបានមកដល់ទីបញ្ចប់មួយដែលតុលាការតម្រូវឱ្យមានការបោះឆ្នោតកាលពីចុងខែ មករា ឆ្នាំ 2009 កន្លងមកនេះ ហើយទ្រព្យសម្បត្តិវត្ត និងលុយកាក់ដែលតុលាការបានគ្រប់គ្រងមួយអន្តរកាលមកនោះ បានចាប់ផ្តើមប្រគល់មកឱ្យគណៈកម្មការវត្តថ្មីដែលដឹកនាំដោយ ប្រាយអ៊ិន បែន គ្រប់គ្រងទៅតាមនីតិវិធីច្បាប់របស់ពុទ្ធិកសមាគមខ្មែរវត្តវិបស្សនារាម (KBA) ដែលគណៈកម្មការចាស់របស់ ទិត ស៊ីផាន់ ត្រូវអស់សិទ្ធិគ្រប់គ្រង និងតវ៉ាតាមផ្លូវច្បាប់ ។ ក្រុមពុទ្ធបរិស័ទដែលដើរតាមគន្លងផ្លូវព្រះពុទ្ធព្រះធមិ និងព្រះសង្ឃ ដែលស្ទើរតែអស់ជំនឿមិនចង់ចូលទៅធ្វើបុណ្យវត្តអារាមណាដែលមានបុគ្គលសង្ឃ ឬមនុស្ស មានទំនាស់គ្នានោះ ពួកគេនិយាយថា សូមឱ្យមានភាពសាមគ្គីគ្នាឡើងវិញ ដើម្បីស្តារមុខមាត់វត្តឱ្យល្អ មានទំនុកទុកចិត្តពីពុទ្ធបរិស័ទ ដោយចៀសវាងការជៀលថា អ្នកមុន និងអ្នកក្រោយវាដូចតែគ្នាយកទីវត្តអារាមដែលជាស្រែបុណ្យធ្វើជាប្រយោជន៍ក្រុម និងបក្ខពួកខ្លួន ៕

# ហោរាសាស្ត្រប្រចាំ ថ្ងៃទី ២៧មីនា_១២មេសា

### ឆ្នាំជូត : (ពពួកទេវតាប្រុស ធាតុទឹក)

រាសីលោកអ្នកខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អ ណាស់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ គឺតែងទទួលបាននូវផលសម្រេចជាប់ជានិច្ច ។ លោកអ្នកអាចបណ្តាក់ទុនរកស៊ី ឬក៏ចេញទៅជួញដូរផ្លូវឆ្ងាយ មិនថាផ្លូវគោក ឬផ្លូវទឹកឡើយ គឺប្រកបតែសេចក្តីសុខ ព្រមទាំងអាចរកចំណូលចូលផ្ទះយ៉ាងគាប់ចិត្តទៀតផង ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមានការយល់ចិត្តគ្នាល្អណាស់ ៕

### ឆ្នាំឆ្លូវ : ( ពពួកមនុស្សប្រុស ធាតុដី )

រាសីលោកអ្នកល្អជាធម្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កប ល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះអ្វីៗច្រើនមានការប្រែប្រួលពុំទៀងទាត់ ឡើយ ដូច្នេះបើលោកអ្នកមានលក់ដីធ្លី ផ្ទះសម្បែង ឬវត្ថុមានតម្លៃផ្សេងៗ ចូរធ្វើលិខិតស្នាមជាលាយល័ក្ខអក្សរដោយមានចុះហត្ថលេខា ឬផ្តិតស្នាមមេដៃឱ្យបានត្រឹមត្រូវទើបទៅថ្ងៃមុខពុំមានបញ្ហាចោទឡើង ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមានភាពស្និទ្ធស្នាលដូចប្រក្រតី ៕

### ឆ្នាំខាល : ( ពពួកយក្សស្រី ធាតុឈើ )

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបបញ្ហាស្មុគ ស្មាញច្រើន ។ ក្នុងរយៈពេលនេះ លោកអ្នកត្រូវចេះគ្រប់គ្រងទ្រព្យឱ្យបានគង់វង្សជាពិសេសអ្នករកស៊ីជួញដូរហាមបណ្តាក់ទុនរកស៊ីដោយទ្រង់ទ្រាយធំ ឬក៏ឱ្យអតិថិជនជំពាក់បំណុលច្រើន ព្រោះអាចនឹងខាតបង់ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមិនសូវបានសុខកាយសប្បាយចិត្តទេ ព្រោះមានរឿងរកាំរកូសច្រើន ៕

### ឆ្នាំថោះ : ( ពពួកមនុស្សស្រី ធាតុឈើ )

រាសីលោកអ្នកខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អ ណាស់ ។ ក្នុងរយៈពេលនេះរាល់ឧបទ្រពចង្រៃ និងរាល់ឧបសគ្គត្រូវបានសាបរលាបបាត់ស្រមោលអស់រលីង ដូច្នេះលោកអ្នកអាចរកស៊ីជួញដូរបានពេញដៃពេញជើង ហើយទោះជាបានជួប នឹងគូប្រជែងជើងខ្លាំងចេញមកតតាំងក៏មិនភ័យព្រួយដែរ ព្រោះលោកអ្នកអាចយកប្រៀបឈ្នះជានិច្ច ។ រយៈពេលនេះចំពោះគូស្នេហ៍ប្រកបតែសេចក្តីសុខសាន្តក្សេមក្សាន្ត ៕

### ឆ្នាំរោង : (ពពួកទេវតាប្រុស ធាតុមាស)

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែទើបឈានចូលឆ្នាំថ្មី ហើយរាល់កិច្ចការងាររកស៊ីនៅជួបនឹងឧបសគ្គខ្លះៗក្តី តែកុំភ័យព្រួយអ្វីឡើយ ព្រោះលោកអ្នកអាចរកដំណោះស្រាយបានជ្រះស្រឡះទាំងអស់ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះប្រយ័ត្នមានអ្នកទីពាចូលមកជ្រៀតជ្រែក ៕

### ឆ្នាំម្សាញ់ : (ពពួកមនុស្សប្រុស ធាតុភ្លើង)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបបញ្ហាលំបាកៗច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ ចូរមានការប្រុងប្រយ័ត្នជាប់ជានិច្ច ជាពិសេសចំពោះអ្នកជំនួញជួញដូរមុននឹងប្រគល់ ឬទទួលនូវមុខទំនិញសព្វសារពើ ត្រូវចេះពិនិត្យមើលគុណភាព និងរាប់ចំនួនឱ្យបានត្រឹមត្រូវទើបមិនចាញ់បោកគេ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះច្រើនពាក់មុខយក្សដាក់គ្នា ៕



### ឆ្នាំមមី : (ពពួកទេវតាស្រី ធាតុភ្លើង)

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះទោះជាលោកអ្នកអាចរកផលចំណូលបានច្រើនគួរសមក្តី តែពុំមានសល់អ្វីជាដុំកំភួនឡើយ ព្រោះការចាយវាយខ្ជះខ្ជាយខ្លាំងពេក ហើយក៏មិនខុសពីទូកធំក្តោងធំដែរ គឺបានត្រឹមតែចំណាយពេលវេលា និងកម្លាំងឥតអំពើ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះទាល់តែចេះអត់ធ្មត់ទើបទទួលបានសេចក្តីសុខ ៕



### ឆ្នាំមមែ : (ពពួកទេវតាស្រី ធាតុមាស)

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយក៏អាចដំណើរការបានស្រួលដែរ ។ ចំពោះអ្នករកស៊ីជួញដូរក្នុងរយៈពេលនេះនឹងមានទ្រព្យហូរចូលប្រៀបដូចត្រូវឆ្នោត ព្រោះមានទំនិញលក់ចេញទិញចូលឥតទំនេរដៃ ។ ចំពោះគូស្នេហ៍ក្នុងពេលនេះកាន់តែប្រកបដោយភាពផ្អែមល្ហែម ៕



### ឆ្នាំវក : (ពពួកយក្សប្រុស ធាតុដែក)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាលំបាកៗច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ ចូរកុំមានការធ្វេសប្រហែសឱ្យសោះ ជាពិសេសចំពោះអាជីវករអ្នករកស៊ីជួញដូរមុននឹងទទួល ឬប្រគល់ទំនិញសព្វសារពើ ចូរចេះពិនិត្យគុណភាព និងរាប់ចំនួនឱ្យបានត្រឹមត្រូវទើបមិនចាញ់បោកគេ ។ ចំពោះគូស្នេហ៍មានរឿងរកាំរកូសច្រើន ៕



### ឆ្នាំរកា : (ពពួកយក្សប្រុស ធាតុដែក)

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះលោកអ្នកនឹងបានជួបនូវគូប្រជែងជើងខ្លាំងចេញមុខមកតតាំង ដូច្នេះចូរចេះរៀបចំជើងព្រួលទុកសម្រាប់ទប់ទល់ជាមុន ទើបមិនលិចលង់ទាន់តែហាមដាច់ខាតការប្រើកម្លាំងបាយដោះស្រាយបញ្ហា ព្រោះវាបានត្រឹមតែខាតបង់ទាំងសងខាងតែប៉ុណ្ណោះ ។ ចំពោះគូស្នេហ៍មានការយល់ចិត្តគ្នាល្អណាស់ ៕



### ឆ្នាំច : ( ពពួកយក្សស្រី ធាតុដី )

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ក៏មិនត្រូវធ្វើទាំងចិត្តតក់ក្រហល់ដោយខ្វះការពិចារណានោះឡើយ ព្រោះបើមានការភ្លាំងភ្លាត់តែបន្តិចអាចបង់ខាតផលប្រយោជន៍ច្រើន ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះ ចូរប្រយ័ត្នប្រយែងក្រែងមានអ្នកក្រៅមកញុះញង់ ៕



### ឆ្នាំកុរ : (ពពួកមនុស្សស្រី ធាតុទឹក)

រាសីរបស់លោកអ្នកស្រុតចុះយ៉ាងខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាស្មុគស្មាញច្រើន ។ ក្នុងរយៈពេលនេះអ្វីដែលលោកអ្នកត្រូវយកចិត្តទុកដាក់នោះ ចូរប្រយ័ត្នប្រយែងចំពោះជនខិលខូចដែលនៅក្បែរៗលោកអ្នក ព្រោះពួកគេមានគំនិតប៉ុនប៉ងធ្វើអំពើអាក្រក់ដោយមិនចេញមុខ ដូច្នេះត្រូវមានស្មារតីប្រុងប្រយ័ត្នជាប់ជានិច្ច ។ ចំពោះគូស្វាមីភរិយា ក្នុងរយៈពេលនេះមានរឿងរកាំរកូសច្រើន ៕

(តមកពីទំព័រទី០១)

## ភ្នំពេញ : កែ គឹមយ៉ាន...

កំណែទំរង់កងទ័ព និងពាក់ព័ន្ធក្នុងជំនួញដីធ្លីកន្លងមកនោះ ត្រូវបានរដ្ឋសភាបោះឆ្នោតគាំទ្រឯកច្ឆន្ទឱ្យធ្វើជាឧបនាយករដ្ឋមន្ត្រីទទួលបន្ទុកគ្រឿងញៀននៅក្រសួងមហាផ្ទៃជាមួយ ស ខេង ជាដន្លងរបស់ខ្លួន ។

ក្នុងបទអន្តរាគមន៍របស់នាយករដ្ឋមន្ត្រី ហ៊ុន សែន ថ្លែងទៅកាន់សមាជិកសភាដើម្បីផ្តល់ការទាក់ទាញសំលេងនោះ បានបញ្ជាក់ថា ការតែងតាំងលោក កែ គឹមយ៉ាន គឺជាតំរូវការចាំបាច់មិនអាចខ្វះបាន ហើយអ្នកទាំងនេះសុទ្ធតែមានសមត្ថភាព និងបទពិសោធទៀតផង ។

ការតែងតាំងលោក កែ គឹមយ៉ាន ក្នុងឱកាសនោះ ត្រូវបានអ្នកនយោបាយមួយចំនួនយល់ថា ជាការផ្សះផ្សារផ្ទៃក្នុងបក្សដែលប្រជែងគ្នាដណ្តើមអំណាចគ្រប់គ្រងផ្តាច់មុខកន្លងមកឱ្យជានាឡើងវិញ ខ្លាចក្រែងគណបក្សប្រជាជនកម្ពុជាបែកជាពីររវាងក្រុម ជា ស៊ីម និង ហ៊ុន សែន ។

ម្យ៉ាងទៀតការតែងតាំងនេះវាជារឿងទាល់ច្រកមួយដែល ហ៊ុន សែន បានសាកល្បងកម្លាំងជាមួយ ជា ស៊ីម ហើយជ្រុលដៃត្រូវអាជ្ញាធរក្រុងហាណូយ ស្តីបន្ទោសឱ្យ ហ៊ុន សែន ត្រូវតែតែងតាំងលោក កែ គឹមយ៉ាន ឡើងវិញដោយខានមិនបាន ។ បើពុំដូច្នេះទេ ហ៊ុន សែន នឹងមានបញ្ហាជាមួយនឹងក្រុងហាណូយ និងផ្ទៃក្នុងបក្សខ្លួនឯងផង ពីព្រោះ ហ៊ុន សែន ធ្វើអ្វីៗពុំបានឆ្លងយោបល់ពី ជា ស៊ីម ជាប្រធាននោះទេ ។

ក្នុងសម័យប្រជុំសភាផ្តល់ការយល់ព្រម ដែលមានតែគណបក្សប្រជាជនកម្ពុជា ហើយគណបក្សសម រង្ស៊ី និងគណបក្សសិទ្ធិមនុស្សបានធ្វើពហិការមិនចូលរួមប្រជុំនោះ ហ៊ុន សែន បានធ្វើការអំពាវនាវដល់សមាជិកសភា ដែលកូនចៅរបស់ខ្លួនឱ្យគាំទ្រ កែ គឹមយ៉ាន ជាឧបនាយករដ្ឋមន្ត្រី និងបុគ្គល 9 រូបទៀត ដែលម្នាក់ជាទេសរដ្ឋមន្ត្រី និង៩រូបទៀតជារដ្ឋលេខាធិការ ដែលការតែងតាំងនេះមានចំនួនច្រើនហួសហេតុខុសពីប្រទេសដទៃនៅលើសកលលោក ។

អតីតនាយឧត្តមសេនីយ៍រូបនេះ ត្រូវបាន ហ៊ុន សែន ស្នើទៅព្រះមហាក្សត្រដោយមិនឆ្លងយោបល់ ជា ស៊ីម ជាប្រធានបក្សឱ្យបណ្តេញពីតំណែងកាលពីចុងខែមករា ក្រោមលេសថា "កំណែទំរង់កងទ័ព" ។ ប៉ុន្តែបន្ទាប់ពីប្រជុំនៅទីស្តីការគណរដ្ឋមន្ត្រីរួច ហ៊ុន សែន បានចោទ កែ គឹមយ៉ាន ថា បានយកតួនាទីរបស់ខ្លួនទៅរកស៊ីដីធ្លី គាបសង្កត់ប្រជារាស្ត្រទៅវិញ ដែលមានដីរាប់សិបម៉ឺនហិកតា ។

ក្នុងពេលជាមួយគ្នានោះដែរ ក្រុមអធិការកិច្ចក្រសួងការពារជាតិ ទីស្តីការគណៈរដ្ឋមន្ត្រី និងខុទ្ទកាល័យនាយករដ្ឋមន្ត្រី បានចុះធ្វើការស៊ើបអង្កេតករណី កែ គឹមយ៉ាន យ៉ាងតក់ក្រហល់ធ្វើឱ្យអតីតនាយឧត្តមសេនីយ៍រូបនេះ ភ័យព្រលឹងចុងសក់ សុំយកតែរួចខ្លួន ហើយមិននឹកស្មានថា ត្រូវឡើងឋានៈខ្ពង់ខ្ពស់បែបនេះទេ ។

ដោយមើលឃើញពីជំលោះរវាង ហ៊ុន សែន និង ជា ស៊ីម កាន់តែជ្រាលជ្រៅនោះ មេដឹកនាំក្រុងហាណូយដែលជាចៅហ្វាយនាយ ក៏បានបញ្ជូនរដ្ឋមន្ត្រីការបរទេសយួនមកធ្វើទស្សនៈកិច្ចនៅក្រុងភ្នំពេញ និងឆ្លៀតពេលបញ្ចុះបញ្ចូល ហ៊ុន សែន ឱ្យតែងតាំងអតីតនាយឧត្តមសេនីយ៍ កែ គឹមយ៉ាន ឡើងវិញ ចៀសវាងប្រេះស្រាំផ្ទៃក្នុងបក្សក៏ដូចជាមានប្រតិកម្មពីក្រុមដែលគាំទ្រសែ ជា ស៊ីម, កែ គឹមយ៉ាន ផងដែរ ។

រាល់ទំនាស់ផ្ទៃក្នុងគណបក្សប្រជាជនកម្ពុជា មេដឹកនាំក្រុងហាណូយតែងបញ្ជូលមន្ត្រីរបស់ខ្លួនមកធ្វើការសម្របសម្រួលជានិច្ច ហើយ ហ៊ុន សែន និង ជា ស៊ីម ទោះបីជាខឹងគ្នាយ៉ាងណាក៏យល់ព្រមតាមសំណើរបស់ចៅហ្វាយនាយជានិច្ច ។ រដ្ឋមន្ត្រីការបរទេសយួនចេញទៅផុតភ្លាមក៏លេចឮនូវការតែងតាំង កែ គឹមយ៉ាន ជាឧបនាយករដ្ឋមន្ត្រីតែម្តង ។

ទាក់ទិនទៅនឹងការតែងតាំង កែ គឹមយ៉ាន នេះ លោក យឹម សុវណ្ណ អ្នកតំណាងរាស្ត្រគណបក្សសម រង្ស៊ី ដែលមិនចូលផ្តល់សេចក្តីទុកចិត្តបានឱ្យដឹងថា គណៈរដ្ឋមន្ត្រីនៅប្រទេសកម្ពុជាវាមានចំនួនច្រើនខ្លាំងណាស់ បើប្រៀបធៀបជាមួយប្រទេសផ្សេងៗទៀតក្នុងពិភពលោក ព្រមទាំងបង្កើតឱ្យមានការិយាធិបតេយ្យ អំពើពុករលួយ និងការចំណាយលុយជាតិកាន់តែច្រើនឡើង ។

លោក យឹម សុវណ្ណ បានបន្តថា មូលហេតុដែលសមាជិកសភាគណបក្សរបស់យើងមិនចូលរួមប្រជុំនោះ គឺយើងជាប់រវល់ស្វែងរកអនុសាសន៍ផ្តល់ទៅឱ្យរដ្ឋាភិបាលធ្វើយ៉ាងណា ដើម្បីដោះស្រាយវិបត្តិសេដ្ឋកិច្ច ភាពគ្មានការងារធ្វើរបស់ប្រជាពលរដ្ឋ កម្មករ-កម្មការិនី និងកសិផលរបស់ប្រជាកសិករលក់មិនចេញ វាប្រសើរជាងនាំគ្នាទៅអនុម័តសមាជិកគណៈរដ្ឋមន្ត្រីកាន់តែច្រើនឡើងនោះ ។

លោក ប៉ែន សុវណ្ណ អតីតនាយករដ្ឋមន្ត្រីរបបសាធារណរដ្ឋប្រជាមានិតកម្ពុជា ដែលត្រូវ ហ៊ុន សែន ចាប់ខ្លួនពេលនេះជាអនុប្រធានគណបក្សសិទ្ធិមនុស្ស ត្រូវបណ្តាញសារព័ត៌មានស្រង់សំដីបានឱ្យដឹងថា ការតែងតាំង កែ គឹមយ៉ាន ជាឧបនាយករដ្ឋមន្ត្រីធ្វើតាមការបញ្ជា និងការគាបសង្កត់ពីក្រុងហាណូយ ។ ពីព្រោះការតែងតាំងនេះជារឿងទាល់ច្រកមុននេះបន្តិច ហ៊ុន សែន ចោទអតីតនាយឧត្តមសេនីយ៍នេះថា បានប្រើតួនាទីជាយោធា ហើយឆ្លៀតឱកាសរំលោភយកដីស្រែរបស់ប្រជាពលរដ្ឋនៅក្នុងប្រទេសកម្ពុជា ។

លោកអតីតនាយករដ្ឋមន្ត្រីបានរំលឹកថា ហ៊ុន សែន បានប្រើប្រព័ន្ធតុលាការឱ្យចាត់ការ កែ គឹមយ៉ាន ប៉ុន្តែដល់ធ្វើជ្រុលដៃត្រូវក្រុងហាណូយស្តីបន្ទោស ក៏ប្តូរចិត្តសំរេចតែងតាំងឱ្យធ្វើជាឧបនាយករដ្ឋមន្ត្រីទី10តែម្តង ដើម្បីជាការផ្សះផ្សារជំរៅចាស់ក្នុងគណបក្ស ។ ( តទៅទំព័រទី១៨ )




# រឿងមីងណយសុំប្រាក់សុខមាលភាពសង្គម (WELFARE)

**ដោយ : គឹម ភៀន**

●●●មីង ណយ គាត់និយាយរឿងគាត់ឱ្យគេឯងបានដឹងពីរឿងគេដេញជើងគាត់ទាន់ជាន់កែងជាប់ ហើយគាត់ស្ទះមិនរួច ។ គាត់មិនសូវមានការឈឺចាប់ ឬក៏ខូចចិត្តអ្វីធំដុំដែរទេ ក្នុងការដែលគេដេញទាន់ជាន់កែងគាត់នេះ ។ គាត់គ្រាន់តែស្តាយដោយការប៉ងប្រាថ្នារបស់គាត់ពុំបានសម្រេចតែប៉ុណ្ណឹងឯង ។ គាត់រអ៊ូតែម្នាក់គាត់ថា "ឯងភ្លាត់ស្នៀតតែបន្តិចចាញ់ប្រាជ្ញគេបណ្តោយខាតប្រាក់មិនចេះតិច" ។ មានអ្នកស្គាល់ជិតស្និទ្ធម្នាក់ បានសួរគាត់វិញភ្លាមថា " បង ណយបងឯងភ្លាត់ស្នៀតអ្វី?" ។ មីង ណយ គាត់និយាយមួយៗ :

-រឿងនេះវាអញ្ចេះទេ មីកាអូន ! ឯងធ្វើការយកលុយសុទ្ធបានមិនសូវគ្រប់គ្រាន់ចាយឱ្យ "បរបូរ" នឹងគេ ។ បងប៉យឱ្យធ្វើដូចគាត់ទៅវាអាចបានលុយ " ស្តេច " ចាយថែមទៀតនឹង សម្បូរមែនទែន ។ ឯងក៏ទៅធ្វើតាមគាត់ក្រែងវាត្រូវប៉ាន់ ។

-ចុះគាត់ឱ្យធ្វើអីទៅ ?

-គាត់ឱ្យរក "ឡយយ័" (មេធាវី) ហើយប្រាប់ថា យើងចង់បានលុយស្តេចចាយនឹងគេ ។ មេធាវីដាក់ខសន្យាខ្លះឯងក៏ព្រម ។ រួចគាត់ក៏បង្ហាញឱ្យទៅទំនាក់ទំនងនឹងលោកគ្រូពេទ្យខាងសរសៃប្រសាទ ។ លោកគ្រូផ្នែកសរសៃប្រសាទ ក៏ដាក់លក្ខខណ្ឌខ្លះរបស់គាត់ឯងក៏ព្រម ទើបគាត់ចេញសំបុត្របញ្ជាក់ថា ឯងមានសតិសម្បទាមិនគ្រប់គ្រាន់ ទើបមិនអាចធ្វើការបាន ។ លោកមេធាវីយកលិខិតបញ្ជាក់នេះមកធ្វើជាមូលដ្ឋាន ដើម្បីស្នើសុំលុយ " ស្តេច " ពីវើលហ្វែរ (welfare) ឱ្យគាត់ចាយ ។ អ្នកជិតស្និទ្ធនឹងមីងណយក៏និយាយកាត់គាត់ភ្លាម : " បង ណយ ឯងធ្វើហ្នឹងវាត្រូវតាមរបៀបគេធ្លាប់តែធ្វើហើយ តើម៉េចក៏ថាចាញ់ប្រាជ្ញគេអី?" ។ មីង ណយ គាត់ឆ្លើយភ្លាម : " មិនទាន់អស់ទេមីកាអូនចាំឯងនិយាយឱ្យវាស្តាប់កុំធ្វើឱ្យឯងដាច់សមាធិមើល ! " ។ អ្នកជិតស្និទ្ធនឹងមីងណយនោះក៏សុំទោសមីង ណយ ហើយក៏ខំស្តាប់តទៅទៀត : "ឯងស្មានថា បានសម្រេចដែរទៅហើយ ព្រោះឃើញខាងវើលហ្វែរ (welfare) គេឱ្យទៅជួបគេ ដើម្បីបញ្ជាក់ពីជំងឺរបស់ឯង ។ ដំបូងគេឱ្យអង្គុយរង់ចាំគេឯងដឹងខ្លួនថា ប្រហែលជាគេលួចពិនិត្យពីអាការរោគរបស់ឯង ហើយក៏ខំសម្តែងល្ខោនបំភាន់គេ ។ ឯងខំយំរាប់រៀបកាលជំនាន់អាពតវាធ្វើបាបឱ្យឯងធ្វើការគ្មានដឹងយប់ថ្ងៃមិនបាន ដេកពួន វាឱ្យបែកពីប្តីពីកូន វាឱ្យអត់ឃ្លានបាយ មិនបានស៊ី ទឹកមិនបានផឹក... និយាយបណ្តើរយំបណ្តើរ ឯងស្រាយកញ្ចប់បាយមកញ៉ាំបណ្តើរស្រាប់តែឯងខំស្រែក ហើយសើចខ្លាំងៗថា នោះ វាហ្នឹងហើយអាពតអញយកគ្រាប់បែកនេះគុប ក្បាលវាឱ្យងាប់ឱ្យឯងងាប់ទៅ...។ ពេលនោះ ឯងខំពូតបាយមួយដុំធំធ្វើគ្រាប់បែក ហើយគុបប្រាវតម្រង់ទៅមាត់ទ្វារដែលគេឱ្យឯងអង្គុយរង់ចាំនោះ ។ មានអី ! ចំពេលល្អមែនទែនមានភ្នាក់ងារវើលហ្វែរម្នាក់ដើរចូលមកដល់មាត់ទ្វារល្មមដុំបាយក៏ហើរទៅបាស់ក្បាលគាត់ព្នសូរប៉ុងដុំបាយបែកខ្ចាយប្រាវប្រឡាក់ពាសពេញមុខគាត់ចូលភ្នែកចូលត្រចៀកគាត់ គាត់ត្រឡប់ក្រោយបែរបាត់ស្រមោលទៅ" ។ ដៃគូជជែករបស់មីងណយក៏សួរភ្លាម "ឱកាសល្អមែនទែនហើយ ! ម៉េចបងណយឯងបែរជានៅស្ងៀមទៅវិញ? បើបានជាគុបចំក្បាលគាត់ទៅហើយ ពេលគាត់ត្រឡប់ក្រោយបែរគួរតែបងណយឯងដេញគុបគាត់ឱ្យខ្លាំងក្លាជាងមុនទើបត្រូវឯងនេះបែរជានៅស្ងៀមទៅវិញ ម៉េចវាសមថាបងឯងជាមនុស្សឆ្កួតទៅកើត? ។ មីងណយតបភ្លាម: " អើមែនហ៊ើយ ! គួរតែឯងដេញតាមឱ្យណាណី! តែពេលហ្នឹងឯងគិតថា គាត់ជាភ្នាក់ងារវើលហ្វែរ ធ្វើឱ្យគាត់ខឹងក្រែងគាត់ឈប់ឱ្យលុយ "ស្តេច " ឯងទៅ!" ។ ដៃគូជជែករបស់គាត់តបភ្លាម : អាហ្នឹងហើយ ដែលគេដឹងថាបងឯងអត់មានឆ្កួតទេ! ។ គាត់ក៏សួរបន្តទៅទៀត : " ចុះរឿងហ្នឹងវាមានអីតទៅទៀតបងណយ ? " មីងណយតបមួយៗ "មានអី... បន្តិចក្រោយមកមានភ្នាក់ងារស្រី២នាក់ដើរចូលមកទៀត ម្នាក់ជាខ្មែរអាមេរិកាំង គាត់ជាអ្នកបកប្រែភាសាម្នាក់ទៀតជាអាមេរិកាំង ខ្មៅ ជាអ្នកសម្រេចថាឱ្យ ឬមិនឱ្យ។ ម្នាក់នេះ គាត់បញ្ជាឱ្យអ្នកស្រីខ្មែរបណ្តើរខ្ញុំដើរតម្រង់ទៅទីធ្លាស្រលះមួយ ហើយឱ្យដើរពីចុងម្ខាងទីធ្លាទៅចុងម្ខាងទៀត ។ ដើរចុះឡើងច្រើនបកគាត់ប្រាប់ថា ឱ្យខំហាត់ប្រាណ ហើយគាត់អង្គុយបញ្ជាពីចម្ងាយ ។ ឯងដើរឡើងរោយចុកអស់ជើងទើបយាយអាមេរិកាំងខ្មៅដើរមកជិតអ្នកបកប្រែភាសា ហើយនិយាយតិចៗឯងខំប្រឹងស្តាប់ដែរ តែអត់ដឹងថាអីទេ... ស្រាប់តែអ្នកបកប្រែស្រែកខ្លាំងៗថា : " មីងណយ ! មកបើកលុយ " ។ ឯង អរខ្លាំងពេកក៏រត់ប្រញាប់ទៅជួបអ្នកទាំងពីរ ។ អ្នកស្រីខ្មៅនិយាយអីមួយឃ្លាវែង ទើបអ្នកបកប្រែនិយាយយ៉ាងទន់ភ្លន់ : "មីងណយ ! យើងខ្ញុំបានសង្កេតឃើញថា មីងឯងអត់មានជំងឺសរសៃប្រសាទទេ ស្តាយណាស់យើងខ្ញុំមិនអាចចេញលិខិតឱ្យមីងទទួលប្រាក់ជំនួយដែលមីងស្នើសុំនោះបានទេ "។ ឯងក៏យំងោងឡើង ព្រោះស្តាយ ស្តាយគ្រប់យ៉ាងទាំងអស់ ។ ដៃគូជជែករបស់មីងណយក៏មានយោបល់បន្ថែម : យិះ ភ្លើមែន ម៉េចក៏ទៅយំវិញ ? គួរតែខំសើចឱ្យបាក់ក បាក់ស្រង់ទើបសមថាយើងជាមនុស្សឆ្កួត នេះបែរជាយំទៅវិញ អស់មានសមជាឆ្កួតអីរលីង ៕

**សូមរង់ចាំអានរឿង " ខ្ញុំមិនឆ្កួតដូចពួកវា នោះទេ " នៅលេខក្រោយទៀត ។**

# ច្បាប់អន្តោប្រវេសន៍នៅសមាគមខ្មែរ

នៅសមាគមខ្មែរ ប្លែកជាងសព្វមួយដង បានលើកគ្នាប្រមាណ ៨០នាក់ មកស្តាប់ការពន្យល់ផ្នែកច្បាប់អន្តោប្រវេសន៍នៅសមាគមខ្មែរ ខាងជើងហ្វីឡាដែលហ្វីយ៉ា កាលពីព្រឹកថ្ងៃសៅរ៍ ទី ២១ មីនា ២០០៩ នេះ ។





មេធាវីពីររូប គឺ EJAZ A. SABIR ហើយនិង THOMAS S. CHENG ដែលអ្នកទាំងពីររូបជាអតីតជនអន្តោប្រវេសន៍នៃសហរដ្ឋអាមេរិក ឥឡូវបានក្លាយទៅជាមេធាវី អាមេរិកាំងទៅហើយនោះ បានទទួលសេចក្តីអញ្ជើញរបស់សមាគមខ្មែរ នៅហ្វីឡាដែលហ្វីយ៉ា ឱ្យមកពន្យល់ពលរដ្ឋ ដែលមានដើមកំណើតខ្មែរ អំពីករណីដ៏សែនលំបាកយល់ ហើយនាំមានកង្វល់ជាច្រើន គឺករណីអន្តោប្រវេសន៍ ។ ព្រឹកថ្ងៃសៅរ៍នេះ គេនាំគ្នាស្តាប់យ៉ាងយកចិត្តទុកដាក់អំពីករណី ដែលអនុញ្ញាតិឱ្យបរទេសម្នាក់អាចទទួលការស្នាក់អាស្រ័យជាស្ថាពរបាន នៅសហរដ្ឋអាមេរិកនេះ ដោយមាន ការបំបែកជាពីរផ្នែក គឺក្រុមអន្តោប្រវេសន៍ និងក្រុមមួយទៀតដែលមិនមែនជាក្រុមអន្តោប្រវេសន៍ ។ រីឯការពន្យល់មួយផ្នែកទៀតនោះ គឺអំពីករណីណាខ្លះ ដែលអនុញ្ញាតិឱ្យទទួល " លិខិតពណ៌បៃតង " ដែលអនុញ្ញាតិឱ្យស្នាក់អាស្រ័យនៅសហរដ្ឋអាមេរិកជាអចិន្ត្រៃយ៍បាន ។ ការពន្យល់បានទទួលការបកប្រែយ៉ាងក្បោះក្បាយដោយអ្នកស្រី រ៉ង ស៊ិន នាយិកាប្រតិបត្តិសមាគម ហេតុនេះហើយបានជាមានសំនួរយ៉ាងច្រើនពីអ្នកចូលរួមស្តាប់ ដែលភាគច្រើនជាស្ត្រីខ្មែរ ។ នៅហ្វីឡាដែលហ្វីយ៉ានេះ មានក្រុមគ្រួសារខ្មែរជាង ២ ម៉ឺននាក់រស់នៅ ហើយនៅក្នុងចំនួននោះ មានប្រមាណជា១០ភាគរយប៉ុណ្ណោះ ដែលបានចូលសញ្ជាតិរួចហើយ យើងពុំមានស្ថិតិថា មានចំនួនប៉ុន្មាននោះទេ ដែលមករស់នៅមិនស្របច្បាប់នៅឡើយនោះ ក៏ប៉ុន្តែមានខ្លះទៀត បើទោះជារស់នៅស្របច្បាប់ហើយក៏ដោយ ក៏នៅពុំទាន់បានចូលសញ្ជាតិបាននៅឡើយ ខ្លះដោយសារចូលសញ្ជាតិមិនបានតែភាគច្រើនពុំដឹងទាល់តែសោះថា ត្រូវធ្វើយ៉ាងណាឱ្យអាចចូលសញ្ជាតិបាននោះទេ ។ រូបភាពថ្មីមួយបានចំរើនឡើង ដោយខ្មែរជាច្រើនបានសំដែងការយកចិត្តទុកដាក់ពីជីវភាពស្របច្បាប់របស់ខ្លួនឯងហើយ ជាពិសេសហ៊ានតាំងសំនួរយ៉ាងក្លាហាន ៕ **ដោយ : ពិន សំខុន**

(តមកពីទំព័រទី១៧)

# ភ្នំពេញ : កែ គឹមយ៉ាន...

លោក ប៉ែន សុវណ្ណ ធ្វើការកត់សំគាល់ថា មន្ត្រីគណបក្សប្រជាជនកម្ពុជាដែលធ្វើធំ ក្រោយពីបណ្តេញចេញពីតួនាទី ហើយនឹងត្រូវគេដំឡើងបុណ្យសក្តិឱ្យធំជាងមុន ដូចករណី កែ គឹមយ៉ាន, លោក ជុំ ហាក់ ផ្កាយមួយ ដែលត្រូវចាប់ខ្លួនរឿងជួញដូរមនុស្ស គ្រឿងញៀន បន្ទាប់ពីមានអន្តរាគមន៍ពី សុខ អាន ចេញពីគុក ហើយក៏ឡើងសក្តិកាន់តែធំដែរ ។

ការតែងតាំង កែ គឹមយ៉ាន ជាឧបនាយករដ្ឋមន្ត្រី វាគ្រាន់តែធ្វើតាមបង្គាប់បញ្ជារបស់ក្រុងហាណូយជាចៅហ្វាយនាយប៉ុណ្ណោះ ប៉ុន្តែវាមិនបញ្ឈប់កំហឹង និងការប្រេះស្រាំផ្ទៃក្នុងគណបក្សរវាងអ្នកគាំទ្រ ជា ស៊ីម, ស ខេង, កែ គឹមយ៉ាន និង ហ៊ុន សែន បានទេ ។

អ្នកតាមដានសភាពការណ៍នយោបាយ បានទស្សន៍ទាយថា ហ៊ុន សែន ពេលនេះបានក្តាប់អំណាចទាំងក្នុងបក្ស និងរដ្ឋាភិបាល ហើយនៅអាណត្តិក្រោយៗទៀតសែស្រឡាយខាង ជា ស៊ីម, ស ខេង ប្រាកដជាត្រូវ ហ៊ុន សែន រុញទម្លាក់ទឹក មិនមានវាសនាអង្គុយកៅអីសំខាន់ៗទៀតទេ ពីព្រោះចំណុចខ្សោយ របស់ ជា ស៊ីម ត្រូវបាន ហ៊ុន សែន ចាប់ជាប់អស់ទៅហើយ ៕

## (តមកនៅទំព័រទី១២) ទាហានសៀមលុកលុយ...

ទំនាស់ព្រំដែន ហើយមិនព្រមប្តឹងទៅអង្គការសហប្រជាជាតិឱ្យជួយដោះស្រាយ ទោះបីជាដឹងថា ការចរចាទ្វេភាគីទទួលរងនូវការប្រមាថ និងការបរាជ័យផ្ទួនៗក៏ដោយ ។

កាលពីថ្មីៗនេះ ហ៊ុន សែន បានជួបជាមួយ អភិស៊ិត វីចាជីវ៉ា នាយករដ្ឋមន្ត្រីសៀម ក្នុងការដោះស្រាយរឿងព្រំដែនដែលកំពុងតែមានទំនាស់ដែរ ប៉ុន្តែភាគីទាំងពីរបានឯកភាពគ្នាតាមអនុសារណៈកាលពីឆ្នាំ2000 ដែលកិច្ចព្រមព្រៀងនេះចុះហត្ថលេខារវាង ហ៊ុន សែន និងអតីតនាយក រដ្ឋមន្ត្រី ថាក់ស៊ីន ស៊ីណាវ៉ាត្រា គឺកិច្ចព្រមព្រៀងនោះខ្មែរចាញ់ប្រៀបសៀមខ្លាំងណាស់ ។

ទាក់ទិនទៅនឹងការព្រមព្រៀងគ្នាតាមអនុសារណៈ ឆ្នាំ2000នេះ លោក ស៊ាន ប៉េងសែ ប្រធានគណៈកម្មាធិការព្រំដែនកម្ពុជាប្រចាំប្រទេសបារាំង បានស្តីបន្ទោសថា ហ៊ុន សែន បានធ្វើឱ្យខ្មែរខាតបង់ក្នុងការចុះហត្ថលេខានេះ គឺភាគីខ្មែរចាញ់ប្រៀបសៀមទាំងស្រុងក្នុងការដោះស្រាយជម្លោះព្រំដែននេះ ពីព្រោះរកលេសគ្រប់បែបយ៉ាងដើម្បីពន្យារពេលដោះស្រាយករណីព្រំដែននេះ ។

សកម្មភាពព្រំដែនជាតិ-អន្តរជាតិ និងអ្នកនយោបាយខ្មែរបានទទូចឱ្យ ហ៊ុន សែន ប្តឹងទៅអន្តរជាតិឱ្យជួយដោះស្រាយ គឺមិនត្រូវចរចាទេ វាគ្មានបានលទ្ធផលអ្វីបន្តិចសោះឡើយ ។ ប៉ុន្តែ ហ៊ុន សែន បែរជាចចែសមិនព្រមដោះស្រាយតួបផ្សំនិងជំហរទន់ជ្រាយផងពួកសៀមបានឆ្លៀតឱកាសនេះឈ្លានពានចូលទឹកដីកម្ពុជាគ្មានខ្លាចរអែងបន្តិចសោះ ៕

## (តមកនៅទំព័រទី១១) សង្គមស៊ីវិលជំរុញឱ្យអាស៊ាន...

កម្ពុជាកាន់តែអាក្រក់ ដែលអង្គការជាតិ-អន្តរជាតិបានចេញសេចក្តីថ្លែងការណ៍ថ្កោលទោសចំពោះពួកឈ្មួញ និងអាជ្ញាធរមួយចំនួនបានរំលោភទៅលើជនស្លូតត្រង់យ៉ាងកំរោល ហើយអង្គការសមាគមដែលធ្វើការងារផ្នែកសិទ្ធិមនុស្សបានបង្ហាញពីក្តីបារម្ភពីការធ្លាក់ចុះនៃសិទ្ធិមនុស្សកាន់តែធ្ងន់ធ្ងរ ។

ការធ្លាក់ចុះនៃសិទ្ធិមនុស្សនាពេលបច្ចុប្បន្នវាបណ្តាលមកពីនាយករដ្ឋមន្ត្រី ហ៊ុន សែន ប្រើអំណាចរបស់ខ្លួនទៅលើសសមាជិកបក្សតាមរយៈអ្នកតំណាងរាស្ត្រឱ្យគាំទ្រតាមគំនិតរបស់ខ្លួនដូចជា ចង់កែប្រែរដ្ឋធម្មនុញ្ញដកអង្គសមាជ និងគ្រប់គ្រងទៅលើស្ថាប័នផ្សេងៗ ដើម្បីដាក់ទោសលើមន្ត្រីគណបក្សប្រឆាំងដើម្បីបំបិទមាត់ចោល ៕

## ព័ត៌មានបន្ថែមពី CEEF

•••ប្រធានមូលនិធិ CEE Foundation បណ្ឌិត ខ្មៅ ស៊ំរ៉ង បានផ្តល់ព័ត៌មានបន្ថែមស្តីអំពីកម្មវិធីរាត្រីសមោសរប្រមូលធនធានជួយដល់ការសិក្សារបស់កូនខ្មែរ ដែលបានប្រព្រឹត្តទៅកាលពីរាត្រីថ្ងៃទី៧ មីនា នៅហ្វីឡាដែលហ្វីយ៉ា ប្រមូលបានប្រាក់ ១០.000ដុល្លារ ហើយប្រាក់នឹងទៅជួយបង្កើតបន្ទប់រៀនកុំព្យូទ័រមួយ តាំងនៅសកលវិទ្យាបច្ចេកទេសភ្នំពេញ ។



រូបថតភ្ជាប់ជាមួយនេះ គឺគណៈកម្មការរៀបចំរាត្រីសមោសរ និងជាសមាជិក CEEF ដែលមួយចំនួនធំមកពីរដ្ឋ វិជីនា រៀបចំកម្មវិធីរួមដៃគ្នាជាមួយក្រុម ហ្វីឡាដែលហ្វៀ ៕

# (តមកនៅទំព័រទី០២) ឆាល សុង ជាវីរបុរសកាកបាទ...


ឆាល សុង និងប្រពន្ធ-កូន

ករណីខុសៗគ្នាជាច្រើនពីការជួយសង្គ្រោះដែលក្រុមវីរជនទាំង23រូបបានបង្ហាញស្នាដៃសង្គ្រោះកន្លងមកដូចជា ឡានបុកគ្នាជ្រុលចូលទៅក្នុងផ្ទះបុកក្មេងៗ ជួយសង្គ្រោះមនុស្សចង់លោតទឹកសម្លាប់ខ្លួន និងការជួយមនុស្សឱ្យផុតពីការសម្លាប់ដោយគាំងបេះដូង ។ល។ ជាដើម ។

ឆាល សុង ប្រធានសមាគមខ្មែរគ្រឿងអលង្ការ និងជាសកម្មជនជួយដោយមិនគិតកម្រៃក្នុងសហគមន៍ខ្មែរ Long Beach ម្នាក់ផងនោះ បានរ៉ាយរ៉ាប់ប្រាប់អ្នកកាសែតខ្មែរប៉ុស្ត៍យើងឱ្យដឹងថា ការដែលខ្លួនគាត់បានក្លាយជាវីរបុរសរបស់កាកបាទក្រហមអាមេរិកក្រុង Long Beach ប្រចាំឆ្នាំ 2009 នេះ គឺដោយសារតែការវាយតម្លៃពីក្រុមគណៈកម្មការជ្រើសរើសរបស់កាកបាទក្រហមអាមេរិក បានមើលឃើញពីការជួយសង្គ្រោះជីវិតប្រពន្ធរបស់គាត់ក្នុងគ្រាថ្ងៃមួយ គឺថ្ងៃទី12 ខែសីហា ឆ្នាំ2008 ដែលប្រពន្ធរបស់គាត់បានវិលមុខដួលសន្លប់ទៅនឹងកម្រាលព្រំដោយសារគាំងបេះដូងនៅក្នុងភោជនីយដ្ឋានឋានសួរថ្មី ។

ខណៈនោះ គាត់ក៏បានជួយសង្គ្រោះជីវិតប្រពន្ធរបស់គាត់តាមក្បួនខ្នាតនៃវិជ្ជាជួយសង្គ្រោះជាបន្ទាន់តាមរូបមន្ត CPR "ខ្ញុំដាក់គាត់ឱ្យដេកសន្តូកជើងត្រង់ទាញកគាត់ឱ្យងើយ... ហារមាត់គាត់ផ្លុំខ្យល់បញ្ចូលដោយមាត់របស់ខ្ញុំរួចហើយខ្ញុំរុញច្រានថ្នមៗនៅលើបេះដូងគាត់ជាច្រើនលើកច្រើនសារ ពេលនោះប្រពន្ធបានដឹងខ្លួនមុនការមកដល់ពីក្រុមជួយសង្គ្រោះរបស់រដ្ឋ" ។

ឆាល សុង បន្តថា វិជ្ជាសង្គ្រោះជាបន្ទាន់ CPR របស់កាកបាទក្រហមដែលគាត់បានរៀនសូត្រ គឺជាវិជ្ជាមានតម្លៃមហាសាលក្នុងការជួយសង្គ្រោះជីវិតប្រពន្ធគាត់" ។ ប្រសិនបើខ្ញុំមិនយល់ដឹងចំណេះវិជ្ជានេះទេ ខ្ញុំមិនដឹងថា ប្រពន្ធរបស់ខ្ញុំស្លាប់ ឬរស់ទេក្នុងហេតុការណ៍នាថ្ងៃនោះ ។

"ការផ្តល់កិត្តិយសជាវីរជនឱ្យ ចំពោះខ្ញុំ កំពុងតែរុញច្រានទឹកចិត្ត និងបេះដូងរបស់ខ្ញុំចង់បន្តការបរិច្ចាគពេលវេលារបស់ខ្ញុំបន្តជួយសង្គមអាមេរិក ឬសហគមន៍ខ្មែរថែមទៀត ដែលមួយជីវិតខ្ញុំ... ខ្ញុំបានជួយដោយមិនខ្លាចហត់នឿយមិនគិតកម្រៃចំពោះបងប្អូនខ្មែរនៅ Long Beach ជាង15ឆ្នាំមកហើយនោះ" ។

គួរបញ្ជាក់ថា នេះជាលើកទី1ហើយដែលកូនខ្មែរបានទទួលនូវកិត្តិយសជាវីរបុរស ក្នុងផ្នែកមនុស្សធម៌ដែលបានជួយសង្គ្រោះជីវិតមនុស្សឱ្យផុតពីការស្លាប់ ក្នុងខណៈដែលកូនខ្មែរជាច្រើននាក់ទៀតបានក្លាយខ្លួនជាវីរបុរសដែលបានលះបង់ជីវិតនៅលើសមរភូមិនៅប្រទេសអ៊ីរ៉ាក់ និងអាហ្គានីស្ថាននៃតំបន់បស្ចឹមបូពា ។

ឆាល សុង បច្ចុប្បន្នមានប្រពន្ធ និងកូនពីរនាក់ ប្រុសមួយ ស្រីមួយ បច្ចុប្បន្នលោកកំពុងតែទទួលនូវរងអំរែកយ៉ាងធ្ងន់ធ្ងរក្នុងការថែរក្សាប្រពន្ធរបស់គាត់ ដែលកំពុងតែទទួលការពិការភ្នែកមើលមិនឃើញ ដែលប្រពន្ធរបស់គាត់បាននិយាយថា "ប្តីខ្ញុំគឺជាឪពុកម្តាយខ្ញុំ គឺជាព្រះពុទ្ធរូបមួយអង្គដែលបានជួយបីបាច់ថែរក្សា និងភាពថ្នាក់ថ្នមផ្អែមល្ហែមបំផុត" ៕

# (តមកនៅទំព័រទី០៩) ជីវិត និងការងារត្រាច់ចរ...

ទុយ ប៊ុនធឿន និយាយដោយសើចជាមួយការហួសចិត្តពីអតីតកាលការងាររបស់ខ្លួនជាមួយក្រុមអ្នកបច្ចេកទេសចំណានៗ ដែលជាអ្នកប្រាជ្ញរបស់ប្រទេសនានានៅអាស៊ីដែលចាំបាច់ត្រូវការឱ្យក្រុមហ៊ុនរបស់គាត់ទៅដំឡើង ឬជួយជួសជុល, បង្រៀន ដោយពួកអ្នកប្រាជ្ញទាំងនោះហាក់បីដូចជាមិនជឿនូវសមត្ថភាពរបស់គាត់ព្រោះពួកគេជាអ្នកប្រាជ្ញយូរឆ្នាំ មានវ័យចំណាស់ស្មើឪពុករបស់ខ្លួន ។ ប៉ុន្តែនៅទីបំផុតពេលដែលពួកគេដឹងឮ និងឃើញផ្ទាល់ភ្នែកក្នុងសកម្មភាពការងារជាក់ស្តែងជាមួយគ្នានោះ ក្រុមអ្នកបច្ចេកវិទ្យានៃប្រទេសទាំងនោះបានផ្តល់តម្លៃ និងការកោតស្ញប់ស្ញែងនូវថ្វីដៃរបស់ប៊ុនធឿន ។

ប៊ុនធឿន និយាយថា គាត់មានមោទនភាពប្រាប់គេថាជាជនជាតិខ្មែរ ប៉ុន្តែពួកអ្នកប្រាជ្ញ និងអ្នកបច្ចេកទេសនានាដូចជាមិនចង់ជឿជាក់ពីការប្រាប់របស់គាត់ទៅដល់ពួកអ្នកទាំងនោះ នៅពេលដែលយើងជួបប្រាស្រ័យទាក់ទងប្រាប់ឈ្មោះ និងមកពីណា ? ។ ពួកគេគិតថា គាត់គឺជាជនជាតិចិនតៃវ៉ាន់ ឬហ្វីលីពីន ឬជនជាតិសិង្ហបុរីទៅវិញ ។ ប៊ុនធឿនតបវិញថា "ខ្មែរមិនទន់ខ្សោយឡើយ ចូរអ្នកក្រឡេកមើលអតីតកាលនៃសម័យមហានគរទាំងស្តេចទាំងរាស្ត្របានបន្សល់ទុកនូវស្នាដៃដ៏មហិមា នៃអច្ឆរិយប្រាង្គប្រាសាទនានា សូមអ្នកកុំមើលជិត និងកុំគិតខ្លីថា ខ្មែរអត់មានអ្នកចេះដឹង ឬអ្នកប្រាជ្ញក្រោយពីកាប់សម្លាប់ឱ្យស្លាប់អស់នៃពួកនិស្សិត បញ្ញវន្ត ក្នុងរបបខ្មែរក្រហមនាអំឡុងឆ្នាំ 1975-1978 ឱ្យសោះ" ។

ជាកូនអ្នកស្រែក្នុងស្រុកមោងឫស្សី ខេត្តបាត់ដំបង ប៊ុនធឿន បានប្រែទឹកមុខក្នុងខណៈដែលអ្នកកាសែតយើងនិយាយពីបញ្ហានយោបាយស្រុកទេស និងសួរពីអនាគតរបស់ ប៊ុនធឿន ថាតើអាចយកចំណេះវិជ្ជាល្អឯកនេះទៅជួយដល់ប្រទេសជាតិខ្លួនបានទេ ? ប៊ុនធឿន ឆ្លើយតបថា "ខ្ញុំស្តាយសង្គមជាតិខ្មែរ, ខ្ញុំស្រឡាញ់មាតុភូមិខ្ញុំណាស់ បើទោះបីខ្ញុំមករស់នៅស្រុកគេ30ឆ្នាំហើយក៏ដោយ គឺខ្ញុំចេះសរសេរ អានភាសាខ្មែរ តាមដានស្ថានការណ៍នយោបាយខ្មែរឥតឈប់ឈរ ដោយខ្ញុំចង់ឃើញខ្មែរចេះរួមដៃគ្នាកសាងជាតិខ្លួន ពិសេសអ្នកដឹកនាំត្រូវឱ្យតម្លៃអ្នកចេះដឹងដូចនៅស្រុកអាមេរិកនេះ ដែលខ្ញុំត្រូវយកចំណេះដឹងរបស់ខ្ញុំជួយបង្រៀន ប្រាប់តម្រង់ផ្លូវផ្តល់ពុទ្ធិទៅឱ្យក្មេងៗជំនាន់ក្រោយ... ខ្ញុំគ្មានបំណងលាក់លៀម ឬបិទបាំងអ្វីទេ ព្រោះវាជាមោទនភាពរបស់ខ្មែរទាំងអស់ ដើម្បីបង្ហាញពិភពលោកថា ខ្មែរមិនអន់ថយឡើយ ។ ប៉ុន្តែអ្វីដែលខ្ញុំមិនទាន់ធ្វើទៅបាននោះ គឺបណ្តាលមកពីប្រទេសកម្ពុជាមិនទាន់មានលទ្ធភាពក្នុងការតម្លើង ឬប្រើប្រាស់សំភារៈបច្ចេកទេសទំនើបៗទាំងនោះនៅឡើយទេ ។ ដែលនេះជាឧបសគ្គចំពោះខ្ញុំដើម្បីទៅជួយជាតិមាតុភូមិរបស់ខ្ញុំ... ហើយទោះជាយ៉ាងណាខ្ញុំ មានសុទិដ្ឋិនិយមថាអនាគតដ៏វែងឆ្ងាយមួយ នៅ20ឆ្នាំខាងមុខទៀតកម្ពុជានឹងមានលទ្ធភាពក្នុងការប្រើប្រាស់សំភារៈបច្ចេកទេសទំនើបៗបែបយុគសម័យប្រព័ន្ធព័ត៌មានវិទ្យាទាំងនោះ ពិតជាមានវត្តមានខ្ញុំជាមួយការវិលត្រឡប់ទៅរស់នៅឯស្រុកកំណើតរបស់ខ្លួនវិញ មុននឹងឈានទៅរកការស្លាប់នោះ" ៕